សារព័ត៌មាន ខ្មែរប៉ុស្ត៍ ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការឿង Vol 07 Issue 141- 8th- 22th Nov. 2013 Free



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

# វត្តត្រៃរតនារាមត្រូវបិទទ្វារ

**ខ្មែរប៉ុស្ត៍ស.រ.អា**

**ឡូវែល** : ចំឱកាសប្រារព្ធពិធីកឋិនទានតាមគន្លងព្រះពុទ្ធ


វត្តលើ


វត្តក្រោម

សាសនាវត្តត្រៃរតនារាមនៅ"ឆែមហ្វឹត"ដែលខ្មែរនៅឡូវែលច្រើនទៅធ្វើបុណ្យនៅទីនោះត្រូវបានបិទទ្វារបណ្តោះអាសន្នដោយគ្មានកំណត់បើកមកវិញ កាលពីថ្ងៃទី០៩ តុលា ឆ្នាំ២០១៣ ដោយសរាចរណ៍ក្រសួងសំណង់ Buiding Department នៃក្រុងឆែមហ្វឹតដោយបុព្វហេតុ ១-ធ្វើការងារ សំណង់ដោយគ្មានលិខិតអនុញ្ញាតិ ២-តចរន្តអគ្គិសនីពីសំណង់ផ្សេងគ្មានសុវត្ថិភាព ៣-គ្មានលិខិតអនុញ្ញាតិសំរាប់បន្ទប់ដេក ៤-កាត់ចរន្តអគ្គិសនីទៅជាន់លើ ។ នេះជាសេចក្តីបញ្ជាឱ្យចាកចេញពីវត្តជាបន្ទាន់របស់ក្រុងឆែមហ្វឹតដោយយោងទៅតាមច្បាប់ ១-សញ្ញាប័ត្រប្រើប្រាស់កន្លែងនៅ ២-ការរំលោភ ៣-សំណង់និងសម្ភារៈគ្មានសុវត្ថិភាព ។ តទៅទំព័រទី ១១

វិចារណកថា

# ខ្វែងយោបល់ ព្រោះតែចង់សង្គ្រោះជាតិ



**វិចារណកថា :**

**ដោយ : ពិន សំខុន**

នៅក្រៅប្រទេសកម្ពុជាបរិញ្ញ័ន្តជាច្រើនដែលមូលមាត់គ្នាគាំទ្រគណបក្សសង្គ្រោះជាតិនាពេលមុនបោះឆ្នោតឡូវែលបែកបាក់គ្នាជាអន្លើដោយសារចរន្តមួយនោះ "ចង់ឃើញ សម រង្ស៊ី-កឹម សុខា ប្រើអាវុធបាតុកម្មដ៏ខ្លាំងក្លាទៅទម្លាយច្រកដែលរាំងស្ទះឆន្ទះប្រជាពលរដ្ឋមិនឱ្យទទួលលទ្ធផលពិតប្រាកដនោះ ទោះជាជួបប្រទះការទប់ទល់ដោយប្រើអំពើហឹង្សាក៏ដោយ" ។ អ្នកទាំងនោះមិនគាំទ្រការចូលរួមសហការណ៍ណាមួយជាមួយគណបក្សប្រជាជននោះទេ ទោះជាគណបក្សប្រជាជនយល់ព្រមឱ្យតំណែងប្រធានរដ្ឋសភាមកគណបក្សសង្គ្រោះជាតិក៏ដោយ ។

មកទល់ពេលនេះខ្មែរផុសស.រ.អាតែងតែផ្តល់បទវិភាគស្ថានការណ៍នយោបាយចែកជូន តទៅទំព័រទី១៩

# បទវិភាគ: តើការទាមទារតំណែងរបស់បក្សសង្គ្រោះជាតិសមហេតុផល ឬទេ ?

**ដោយ : ជី វិកា ២០១៣-១០-២២**

ក្រោយពីមិនបានជោគជ័យក្នុងការតវ៉ាផ្លូវច្បាប់ដើម្បីស្វែងរកការពិតជូនម្ចាស់ឆ្នោតចំពោះគណបក្សរបស់ខ្លួន ដើម្បីអោយមានតុល្យភាពអំណាចជាមួយគណបក្សប្រជាជនកម្ពុជាដែលដឹកនាំរដ្ឋាភិបាល។ ប៉ុន្តែការទាមទារនេះត្រូវ



ភាពមិនប្រក្រតីនៃការបោះឆ្នោតឆ្នាំ២០១៣នេះ ថ្នាក់ដឹកនាំគណបក្សសង្គ្រោះជាតិបានងាកមកចរចាទាមទារយកតំណែងប្រធានរដ្ឋសភាជូនលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បដិសេធដោយសំអាងថា វាខុសនឹងគោលការណ៍លទ្ធិប្រជាធិបតេយ្យ។ តទៅទំព័រទី ២០

# លទ្ធផលបោះឆ្នោតជ្រើសរើសក្រុមប្រឹក្សាក្រុងឆ្នាំ២០១៣

**ប្រែសម្រួលដោយ :សុខា**

**ដោយរីឆាដ ហូវ**

ថ្ងៃទី៥ វិច្ឆិកា ឆ្នាំ២០១៣ សាលាក្រុងឡូវែលបានរៀបចំការបោះឆ្នោត តទៅទំព័រទី ៦

# 2013 City Election Results

*by Richard P. Howe Jr.*


Richard Howe Jr.

On November 5, 2013 the city of Lowell held its local election. Of the 56,093 people registered to vote in the city, only 11,581 ( 20%) participated in the election. Four new candidates were elected to the city council. They are Daniel Rourke, James Milinazzo, William Samaras *Continued to Page18*

# ព្រឹទ្ធាចារ្យ អៀង ស៊ីថុល កំពុងស្វែងរកថវិកាទ្រទ្រង់ក្រុមកុមារបាសាក់






**ដោយ : សុខា**

**ក្រុងឡូវែល:** លោក អៀង ស៊ីថុល ជាសិល្បករប្រឡូកក្នុងពិភពសិល្បៈអំឡុងពី២ទៅ៣ទសវត្សមុនជំនាន់នឹងសិល្បករស្រករលោកមានលោក ពេជ្រ ភិរុណ អ្នកគ្រូ គង់ ណារី អ្នកស្រី សូ សុវណ្ណារី លោក ណុប សម្បត្តិ ក៏ដូចជាលោកឈន សំអាត សុទ្ធសឹងតែជាសិល្បករមានឈ្មោះបោះសម្លេង និងខ្លះបានវិវត្តខ្លួនជាអ្នកដឹកនាំរឿង និងសាស្ត្រាចារ្យបង្ហាត់ក្នុងវិស័យសិល្បៈ នាពេលបច្ចុប្បន្នសំដៅបន្តអត្ថិភាពនៃវិស័យឱ្យរស់នៅគង់វង្សឡើង។

បច្ចុប្បន្ន លោក អៀង ស៊ីថុល មានតួនាទីជាសាស្ត្រាចារ្យនៅសាលាភូមិន្ទវិចិត្រសិល្បៈផ្នែកចម្រៀងទន្ទឹមនឹងតួនាទីជាព្រឹទ្ធាចារ្យនៅសិល្បៈខ្មែរអមតៈគ្រប់គ្រង និងរៀបចំកម្មវិធី ហើយក៏ជាប្រធានក្រុមកុមារបាសាក់ធ្វើការជាមួយនាយកដ្ឋានសិល្បៈផ្នែករដ្ឋ។ លោកមាននិស្ស័យជាមួយវិស័យសិល្បៈតាំងពីកំណើតមកម្ល៉េះ ហើយធំធាត់ឡើងដោយបានស្ដាប់ជីតារបស់លោកច្រៀង និងសម្ដែងក្នុងពិធីនានាតាមភូមិមានមង្គលការជប់លៀងថ្វាយអារក្ស និងបុណ្យទាននានា។

លោកធ្លាប់មានសេចក្ដីប៉ងប្រាថ្នាជាតួឯកកុនអ្នកចម្រៀង និងអ្នកសម្ដែង។ និមិត្តរូបសិល្បៈករក្នុងចិត្តរបស់លោករួមមានផ្នែកចម្រៀងល្ខោនគឺលោក សាំង សារុន ផ្នែកចម្រៀងសម័យ គឺលោក ស៊ិន ស៊ីសាមុត ផ្នែកភាពយន្តគឺលោក ជាយុទ្ធថន ហើយផ្នែកភ្លេង គឺលោកចង់ក្លាយជាអ្នកភ្លេងល្អបំផុត។ យ៉ាងណាមិញជំនាញដ៏ច្រើនក្នុងពេលតែមួយ និងសម្រាប់មនុស្សម្នាក់ជារឿងពិបាកនឹងទៅរួច ។ ដូចនេះ លោកស្វែងយល់ឃើញពីទេពកោសល្យរបស់ខ្លួនគឺជាអ្នកច្រៀងល្ខោនផ្នែកបុរាណ និងប្រពៃណី។ ទន្ទឹមនឹងនេះលោកមានសមត្ថភាពលេងខ្លុយទ្រ ខឹម តាខេ និងសម្ដែងរបាំប្រពៃណីប្រជាប្រិយព្រមទាំងអាចនិពន្ធរឿងចម្រៀង និងកំណាព្យបានទៀតផង។

គ្រូបាធ្យាយផ្នែកសិល្បៈទាំងផ្ទាល់ និងប្រយោលរួមមានឈ្មោះ លោកគ្រូទក ខ្មៅ អ្នកគ្រូ ហាម ណាម លោកគ្រូ ពេជ្រទុំ ក្រវិល លោកគ្រូ ម៉េង ហ៊ុន អ្នកគ្រូ អែម ធាយ លោក គ្រូ ឃិន សាំង និងគ្រូបង្រៀនកំណាព្យ អ៊ុំ មន្ថា។ នាឱកាសសំណេះសំណាលពិសារអាហារពេលព្រឹកលោកព្រឹទ្ធាចារ្យ អៀង ស៊ីថុល មានបេតិសោមនស្សដែលបានអញ្ជើញមកសម្ដែងនៅសហរដ្ឋអាមេរិកក្រុងឡូវែលរដ្ឋម៉ាសាឈូសេតជាលើកទី៥។ គោលបំណងសម្ដែងនៅអាមេរិកលើកនេះ គឺដើម្បីប្រមូលថវិកាទ្រទ្រង់ក្រុមកុមារបាសាក់ដែលបច្ចុប្បន្នស្ថិតនៅក្នុងការដង្ហើយហៅរកជំនួយសម្រាប់ផ្គត់ផ្គង់កូនសិស្សក្នុងបន្ទុករួមមានការចំណាយលើអាហារសម្លៀកបំពាក់អគារដែលជួល និងប្រាក់ខែសម្រាប់បង់ជូនគ្រូបង្រៀន។ គួរបញ្ជាក់ថា ក្រុមកុមារបាសាក់ជាក្រុមសម្ដែងសិល្បៈមាន ទាំងរបាំ បុរាណប្រជាប្រិយចម្រៀង និងសិល្បៈផ្សេងៗជាច្រើនទៀតដែលសម្ដែងដោយសិស្សដែលបានស្វែងយល់រៀនសូត្រហ្វឹកហាត់ការសម្ដែងក្នុងក្រុមកុមារបាសាក់ដែលពីមុនមកក្រុមនេះមានឈ្មោះថា សមាគមបណ្ដុះបណ្ដាលកុមារកំព្រាទីទ័លក្រ ហើយក្រុមកុមារបាសាក់នេះមានសិស្សបីប្រភេទទីមួយ គឺក្មេងដែលពុំមានឪពុកម្ដាយទីពីរ គឺក្មេងដែលតែឪពុក និងទី៣គឺក្រុមក្មេងដែលមានតែម្ដាយ។



លោក អៀង ស៊ីថុល សម្ដែងនៅភោជនីយដ្ឋាន សំពៅមាស ថ្ងៃទី២៦តុលា ឆ្នាំ២០១៣ ប្រមូលថវិកាជួយក្រុមកុមារបាសាក់






ជំនួយឧបត្ថម្ភដល់ក្រុមកុមារបាសាក់តាមគ្រប់រូបភាពមានអត្ថប្រយោជន៍ក្រៃលែងដល់ក្រុមកុមារបាសាក់យោងតាមប្រសាសន៍របស់លោក អៀង ស៊ីថុល។

ការជួយជាអង្គរក្ដីថវិកាតិចក្ដីច្រើនក្ដីនឹងជាមធ្យោបាយរក្សាក្មេងៗដែលកំពុងរៀន និងសម្ដែងក្នុងក្រុមកុមារបាសាក់ឱ្យមានស្ថិរភាពមានអនាគតល្អ និងអាចរក្សានូវសិល្បៈខ្មែរឱ្យគង់វង្សបានមួយផ្នែក។ ជំនួយដែលត្រូវការនឹងត្រូវយកប្រើក្នុងចំនុច៥សំខាន់ៗ ទីមួយគឺសម្រាប់ស្បៀងសម្ភារៈសិល្បៈសម្ដែងមួយចំនួន ការសិក្សា និងហូបចុក។ ទី២គឺថវិកាសម្រាប់ជូនគ្រូបង្វឹកបង្ហាត់បង្រៀនចំនួន៤នាក់។ ទី៣គឺថវិកាសម្រាប់បង់ថ្លៃសាលារៀនក្មេងដែលហាត់រៀន។ ទី៤ថវិកាសម្រាប់បង់ថ្លៃស្នាក់នៅ។ ទី៥ គឺគម្រោង សាងសង់អគារដែលមានកន្លែងរៀនផង ស្នាក់នៅផង មាន២ខ្នង និង៤បន្ទប់។ បើការប្រមូលថវិកាបានជោគជ័យលោកមានសង្ឃឹមថានឹងបានជួយកូនខ្មែរឱ្យបានច្រើនឡើង។

និយាយពីជីវិតផ្ទាល់ខ្លួនលោក អៀង ស៊ីថុល កើតនៅថ្ងៃទី១៧ ខែកក្កដា ឆ្នាំ១៩៥៧ មានទីកន្លែងកំណើតនៅភូមិត្បូងភ្នំ ឃុំវាល ស្រុកគងពិសី ខេត្តកំពង់ស្ពឺ។ ឪពុកនាម អៀង ម៉ន។ ម្ដាយនាម មាស ឡោ។ លោករៀបការជាមួយអ្នកសិល្បៈដូចគ្នា គឺ អ្នកស្រី ពេជ្រ គន្ធារី នៅ ឆ្នាំ១៩៧៩ ហើយមានកូនប្រុស២នាក់ និងស្រី២នាក់។ លោក អៀង ស៊ីថុល ធ្លាប់បានអញ្ជើញទៅសម្ដែងច្រើនប្រទេសរួមមានកាណាដា បារាំង ប៉ូឡូញ បែលហ្សិក ស្វីស អ៊ីតាលី អាល្លឺម៉ង់ កូរ៉េ អង់គ្លេស អៀរឡង់ និងអាមេរិក។

លោកអៀង ស៊ីថុល ស្វាគមន៍ការឧបត្ថម្ភគាំទ្រមកកាន់ក្រុមកុមារបាសាក់ ហើយអាចទាក់ទង តាមអ៊ីម៉ែល iengsithul@yahoo.com/ iengsithul@gmail.com លេខទូរស័ព្ទ 012 55 57 59។ ឬអាចទាក់ទងមកក្រុមប្រឹក្សាវប្បធម៌ខ្មែរតាមអាស័យដ្ឋាន ៦ Pine Street, Lowell, MA 01852 និងលេខទូរស័ព្ទ 978 427 5447៕




# លោកមេត្រី កែវ និង អេវ៉ាន ហន ទទួលការកោតសរសើរពីស្ថាប័នកាយរិទ្ធអាមេរិក ( Boy Scouts of America) ក្នុងការបម្រើសហគមន៍

ដោយ : សុខា

**លែនហ្ស៊ី ក្រុងជ្រេខិត:** ថ្ងៃទី២៤ តុលា ឆ្នាំ ២០១៣ មេធាវី មេត្រី កែវ (Metrey Keo) និង ប្រឹក្សាការី អេវ៉ាន ហន (Evan Horn) ទទួលកិត្តិយសបានការកោតសរសើរពីស្ថាប័នកាយរិទ្ធអាមេរិកសម្រាប់សកម្មភាពក្នុងមូលហេតុបម្រើសហគមន៍ទទ្ទឹមគ្នានឹងស្វាមីភរិយាមួយគូ គឺលោក ខេណេត ឡេវេលី (Kenneth Lavallee) ជាប្រធានប៉ូលីសដែលចូលនិវត្តន៍ និងភរិយា ស៊ូសាន (Susan Lavallee) ជាគិលានុបដ្ឋាយិការជំនាញដែលមានបទពិសោធន៍ជិត២០ឆ្នាំ ។


Evan Horn - Metrey Keo - Susan Lavallee - KennethLavallee

លោកមេត្រី កែវ និង អេវ៉ាន ហន ជាបញ្ញវ័ន្តខ្មែរវ័យក្មេងជំនាន់ក្រោយដែលបានបំពេញការងារសកម្មទាំងក្នុងអាជីព និងកិច្ចការងារសហគមន៍។ បច្ចុប្បន្នលោក មេត្រី កែវ ជាមេធាវីនៅការិយាល័យច្បាប់ ម៉ាខត់ (Marcotte Law Firm) រីលោក អេវ៉ាន ហន ជាប្រឹក្សាការីនៅក្រុមហ៊ុន ខូឡាបូរេធីវ ខុនសាល់ធីង (Collaborative Consulting)។ អ្នកទាំងពីលះបង់ពេលវេលាស្ម័គ្រចិត្តចូលរួមដឹកនាំកម្មវិធីភាពជាអ្នកដឹកនាំវ័យក្មេង (Young Professional Program) នៅសមាគមន៍ខ្មែរហៅកាត់ថា ស៊ី អឹម អេ អេ (CMAA)។ ក្នុងនោះលោកមេត្រី និងអេវ៉ានជួយបង្ហាត់បង្រៀនទៅដល់កូនខ្មែរជំនាន់ក្រោយដែលកំពុងរៀន ឬបញ្ចប់មហាវិទ្យាល័យចំនួន១០ទៅ១៥នាក់ក្នុងមួយឆ្នាំៗ អំពីមេរៀនភាពជាដឹកនាំការសរសេរស៊ីវី(CV)ឱ្យត្រឹមត្រូវតាមក្បួនខ្នាតការត្រៀមលក្ខណៈសម្រាប់ការសម្ភាសន៍ការងារការថ្លែងសន្ទរកថា ជាសាធារណៈ និងជំនាញប្រាស្រ័យទាក់ទងក្នុងសង្គមជាដើម។ អ្នកទាំងពីរបានថ្លែងថា កម្មវិធីភាពជាអ្នកដឹកនាំវ័យក្មេង (Young Professional Program) នេះទទួលបានភាពជោគជ័យល្អប្រសើរ ហើយកូនខ្មែរវ័យក្មេងជំនាន់ក្រោយ


Lada Lau


Brian Sok

អាចទទួលបានចំណេះដឹងមួយចំនួនបន្ថែមទៅលើអ្វីដែលពុំមានបង្រៀននៅសាលា ហើយអ្នកទាំងអស់នោះបានឃើញ និងទាក់ទងដោយផ្ទាល់ជាមួយគ្រូបង្គោលខ្មែរដែលបច្ចុប្បន្នកំពុងធ្វើការក្នុងស្ថាប័ននានានៅក្នុងសហគមន៍។ អាស្រ័យហេតុនេះ អ្នកទាំងអស់នោះ មាននូវសក្តានុពលច្រើនដែលជួយដឹកនាំគេឱ្យទៅដល់គោលដៅ និងបំណងប្រាថ្នា ក្នុងអនាគតការងារ។

ប្រាយអិន សុខ (Brian Sok) អតីតប្រធានសមាគមនិស្សិតខ្មែរអាមេរិកាំង (Cambodian American Student Association) នៅសាកលវិទ្យាល័យរដ្ឋម៉ាសាឈូសេត (UMASS Lowell) ជាសិក្ខាកាមម្នាក់ដែលចូលរួមក្នុងកម្មវិធីភាពជាអ្នកដឹកនាំវ័យក្មេង (Young Professional Program) នៅសមាគមខ្មែរ។ ប្រាយអិនបានថ្លែងថា គេរៀនបានច្រើនពីកម្មវិធីភាពជាអ្នកដឹកនាំវ័យក្មេង (Young Professional Program) ហើយគេចាប់ផ្តើមចូលរួមកម្មវិធីនេះ នៅពេលដែលគេអាយុ២២ឆ្នាំ ខណៈដែលគេជានិស្សិតឆ្នាំទី៣ ជំនាញគ្រប់គ្រងជំនួញនៅសាកលវិទ្យាល័យរដ្ឋម៉ាសាឈូសេត (UMASS Lowell)។ ប្រាយអិនមានគោលបំណងក្នុងការបន្តថ្នាក់ក្រោយឧត្តមក្នុងជំនាញអនុបណ្ឌិតគ្រប់គ្រងពាណិជ្ជកម្ម។ ប្រាយអិន បានមានមតិថា ចង់ឱ្យកូនខ្មែរនានាចូលរួមសិក្សាស្វែងយល់ក្នុងកម្មវិធីភាពជាអ្នកដឹកនាំវ័យក្មេង (Young Professional Program) ឱ្យបានកាន់តែច្រើន ព្រោះទទ្ទឹមនឹងចំណេះដឹងបន្ថែមពួកគេអាចប្រាស្រ័យទាក់ទងជាមួយគ្រូបង្គោលនានា ហើយអាចរៀនបានយ៉ាងច្រើនពីអ្នកទាំងនោះ។

ជាមួយគ្នានេះ ឡាដា ឡូវ ជាសមាជិកម្នាក់នៅក្នុងកម្មវិធី Young Professional Program ពេញចិត្តកម្មវិធីនេះខ្លាំងណាស់ នាងមានអាយុ២៣ឆ្នាំ និងបញ្ចប់ការសិក្សាពីមហាវិទ្យាល័យ ម៉ែរីម៉ាក់ បច្ចុប្បន្ននាងជាបុគ្គលិកពេញម៉ោងម្នាក់នៅក្រុមហ៊ុនវិលធើ វ៉ាយមែន ។

រូថ្ស ក្រូខឺ (Ruth Crocker) ទទួលបន្ទុកក្នុងការរៀបអង្គាសថវិកានៅស្ថាប័នកាយរិទ្ធអាមេរិកសម្រាប់បង្កើតកម្មវិធីផ្តល់កិត្តិយសកោតសរសើរបុគ្គលសកម្មទាំង៤រូបក្នុងឆ្នាំ២០១៣ ក្នុងឱកាសដែលមានខ្មែរវ័យក្មេងទទួលបានកោតសរសើរដូច្នេះ


លោក មេត្រីកែវ ព្រមទាំងក្រុម Young Profesional Program

អ្នកនាងបានមានប្រសាសន៍ថា នាងមានសេចក្តីសោមនស្សរីករាយដែលបានឃើញការចូលរួមជួយសហគមន៍តាមរយៈបញ្ញវ័ន្តខ្មែរវ័យក្មេងដែល

តទៅទំព័រទី ៣០

# រំលឹកទៅរដូវកាលបោះឆ្នោតឆ្នាំ១៩២៦

**ខ្មែរផុស.រ.អា**

ចាំមិនភ្លេចពីការចាប់ជម្រិតបេក្ខជនអភិបាលក្រុង មេហែន (Mahan) និងមនុស្សកកកុញក្នុងប្រវត្តិសាស្ត្រនយោបាយឡូវែល ។

ថ្ងៃទី១៥វិច្ឆិកាឆ្នាំ១៩២៦ ព្រឹត្តិការណ៍ប្រវត្តិសាស្ត្រក្នុងក្រុងឡូវែលក្នុងស្ថានភាពនយោបាយមួយដែលមានប្រជាពលរដ្ឋកកកុញទាំងក្នុង និងក្រៅសាលាសហសាល (Lowell Memorial Auditorium) សរុប១ម៉ឺន១ពាន់នាក់ចូលរួម និងតាមដានសន្និសីទបេក្ខជនអភិបាលក្រុងទាំង១០រូប នាកាលនោះ។ ចំនួនប្រជាពលរដ្ឋដ៏ច្រើនសន្ធឹកសន្ធាប់ថ្ងៃបោះឆ្នោតនាកាលនោះជាតួរលេខអញ្ចត្តកម្មដែលកម្រមាន។

ទន្ទឹមគ្នានឹងភាពពុះកញ្ជ្រោលចូលរួមពីប្រជាពលរដ្ឋក្នុងថ្ងៃបោះឆ្នោតព្រឹត្តិការណ៍ភ្ញាក់ផ្អើលមួយទៀតគឺការចាប់ជំរិតបេក្ខជនអភិបាលក្រុងមេហែន (Mahan) ជាម្នាក់ក្នុងចំណោមបេក្ខជនឈរឈ្មោះ១០រូប ។ នៅវេលាម៉ោង ១២ និង៣០នាទី រំលងអធ្រាត្រនាថ្ងៃបោះឆ្នោត លោកមេហែន **តទៅទំព័រទី ១០**

# Kidnapping! Libel! Recount! Lowell Election Season 1926 ...

*Posted on October 29, 2013*
*By Jennifer Myers, Mayor's Aid*
*Photo Courtesy by City Hall Official Blog "Room 50"*

They say Lowell politics is a blood sport. That has never been truer than in the 1926 mayoral race (back in the strong mayor days).

In the early morning hours of Monday November 15, 1926, May Mahan, wife of Lowell Police officer and mayoral candidate John W. Mahan, reported her husband had been kidnapped; snatched from their apartment at 466 Merrimack St. by four masked men.

Mrs. Mahan said she heard her husband return home at 12:30 a.m. and 15 minutes later heard a crash followed by a gruff voice saying "Come along. We want you. Come with us – -hurry up. No fooling now."

Mrs. Mahan ran from her bedroom and looking out the window witnessed the men push her husband into a car across the street and drive away. *Continued to page 10*



mahancharges


corbettad


bradenad

mahanportrait

# ឡូវែលគណៈក្រុមប្រឹក្សាក្រុងខ្មែររបូតតំណែង

**ដោយ : ពិន សំខុន**

នាឱកាសបោះឆ្នោតផ្តាច់ព្រាត់កាលពីថ្ងៃទី៥ ខែវិច្ឆិកានេះ លោក វ៉ាស្នា នួន ពុំបានជាប់ជា (កុស៊ីល័រ) ទេ បានន័យថា ពុំមានតំណាងសញ្ជាតិខ្មែរនៅជាគណៈក្រុមប្រឹក្សាអភិបាលក្រុងទៀតទេ។



Vesna Nuon



Van Pech

ហេតុអ្វីក៏ខ្មែរអាមេរិកាំងចុះឈ្មោះប្រមាណ៧ពាន់នាក់មិនបានលើកបេក្ខជនខ្មែរឱ្យទៅកាន់តំណែងអភិបាលក្រុង?

យើងបានធ្វើការវិភាគជាមួយខ្មែរនៅឡូវែលមួយចំនួននៅពេលកំពុងបោះឆ្នោតនឹងបោះឆ្នោតហើយក្តៅៗ បានឃើញបុព្វហេតុមួយចំនួនឆ្លើយតបនឹងសំណួរនេះ?



សកម្មភាពបោះឆ្នោតថ្ងៃទី៥ វិច្ឆិកា ឆ្នាំ២០១៣
Photo of kristin Ross Sitcawich Campaign's Page

**១សន្លឹកឆ្នោតខ្មែរបែកជាភាគតូចៗដាច់គ្នា** ដោយសារឃើញការឃោសនាបេក្ខជន វ៉ាស្នា នួន នឹងវ៉ែន ពេជ្រ មិនសាមគ្គីគ្នា ដោយសារបេក្ខជនស្បែកសមានកម្លាំងសាមគ្គីនឹងប្រជាប្រិយភាពខ្ពស់ច្រើនរូប មកឈរឈ្មោះ ។

**២-សន្លឹកឆ្នោតបេក្ខជនខ្មែរមកពីជនជាតិភាគតិចឯទៀតៗ** សារនឹងសកម្មភាព វ៉ាស្នា នួន មិនបានធ្វើឱ្យគេចង់ចាំនឹងជឿថា ជាធនធានដល់សហគមន៍គេផងទេ និងឆ្នោត វ៉ែន ពេជ្រ នៅក្មេង បទពិសោធន៍តិច ជាបេក្ខជនថ្មី ។

**៣-សន្លឹកឆ្នោតពីអាមេរិកាំងម្ចាស់ស្រុក :** វ៉ាស្នា នួន និយាយថា គ្មានទំនាស់នឹងនរណាទេ តែសារដែលទៅដល់អ្នកបោះឆ្នោតឃើញថា មានទំនាស់យ៉ាងចំហរជាមួយបេក្ខជនឯទៀតៗជាពិសេសជាមួយបេក្ខជនប្រជាប្រិយ៍របស់ម្ចាស់ស្រុក។

**៤-កាសែតឡូសាន់ បើកកកាយថា មានរឿងអាស្រូវ:** ដំណឹងអាក្រក់២លើកបានត្រូវបើកកកាយចំពោះបេក្ខជនវ៉ាស្នា នួន តែ វ៉ាស្នា នួន ពុំបានប្រើឱកាសដ៏ល្អនេះ សម្រាប់ឆ្លើយតបនឹងផ្សព្វផ្សាយទៅអ្នកបោះឆ្នោតវិញទេ បែរជាទទួលយកកំហុសយ៉ាងស្ងៀមស្ងាត់ ។

**៥-សន្លឹកឆ្នោតពីសហគមន៍ខ្មែរ** សហគមន៍ខ្មែរត្រូវរបួសដោយរឿងរ៉ាវធំៗដូចជាខ្មែរបែកបាក់គ្នាដោយជម្លោះវត្តលើវត្តក្រោមបែកបាក់គ្នាដោយរឿងអាស្រូវ **តទៅទំព័រទី ១០**

## តមកទំព័រទី ១ លទ្ធផលបោះឆ្នោតជ្រើសរើសក្រុម...

ក្នុងតំបន់។ ក្នុងចំណោមអ្នកចុះឈ្មោះបោះឆ្នោតចំនួន៥៦០៩៣នាក់ដែលនៅក្នុងក្រុងមានប្រជាជនចំនួន១១៥៨១នាក់ស្មើនឹង២០ភាគរយប៉ុណ្ណោះនៃប្រជាជនដែលចូលរួមបោះឆ្នោត។ បេក្ខជនថ្មីចំនួន៤នាក់ត្រូវបានជាប់ឆ្នោត។ អ្នកទាំង៤គឺ ដេញ៉ូល រូគី ចេមស៍ មីលីនណាហ្សូវីលៀម សាម៉ារ៉ាស់ និង ខរី ប៊ីលែនជី។ ទីប្រឹក្សាក្រុងថ្មីទាំង៤នាក់ចូលមកកាន់តំណែងជំនួសអភិបាលក្រុង ផាទ្រីក មឺហ្វី ដែលមិនមានបំណងស្វែងរកការបោះឆ្នោតជាថ្មីទៀត ព្រមទាំងប្រឹក្សាក្រុងកាន់តំណែងមុនថ្ងៃបោះឆ្នោតទី៥ វិច្ឆិកា រួមមានទីប្រឹក្សាក្រុងម៉ារទី ឡរី ចូ មិនដុនកា និង វ៉ាសនា នួន ដែលមិនទទួលបានជោគជ័យក្នុងការស្វែងរកការគាំទ្រជាថ្មី។

សម្រាប់គណៈកម្មការសាលាមានគណៈកម្មការសាលាក្នុងតំណែងចំនួន៦នាក់ ដែលស្វែងរកការគាំទ្រជាថ្មីក្នុងការបោះឆ្នោតគាំទ្រសារជាថ្មីទៀត ទល់នឹងបេក្ខជនថ្មីម្នាក់គឺ ស្ទេវិនហ្គិនជ្រុន ដែលត្រូវបានជាប់ឆ្នោត ហើយសមាជិកក្នុងតំណែងក្នុងគណៈកម្មការសាលាត្រូវបានជំនួសតំណែង។ សម្រាប់ការបោះឆ្នោតជ្រើសរើសគណៈកម្មការសាលាក្នុងតំបន់គណៈកម្មការក្នុងតំណែង ហ្វ្រិដ បូប្លា និង ចច អូហែរ ត្រូវបានជាប់ឆ្នោតសារជាថ្មី។ ចំណែកបេក្ខជនប្រកួតប្រជែងថ្មី បុប្ផា ពៅ មិនត្រូវបានជាប់ឆ្នោតឡើយ ៕

# កាត់បន្ថយឥទ្ធិពលឈ្មួញធំៗជាគន្លឹះមួយសម្រាប់កំណែទម្រង់របស់រដ្ឋាភិបាល

**ដោយ : ប៉ែន បូណា**

រហូតមកទល់ពេលនេះ ឈ្មួញរកស៊ីធំៗនៅតែមានឥទ្ធិពលខ្លាំងទៅលើអាជ្ញាធរមានសមត្ថកិច្ច។ ឈើប្រណីតនៅតែត្រូវគេដឹកចេញពីព្រៃឥតឈប់ឈរបើទោះបីជាប្រមុខរដ្ឋាភិបាលបានចេញបទបញ្ជាម៉ឺងម៉ាត់ឱ្យបញ្ឈប់ជំនួញឈើខុសច្បាប់ក៏ដោយ។ ក្រៅពីជំនួញឈើក៏នៅមានឈ្មួញធំៗជាច្រើនទៀតកំពុងប្រើឥទ្ធិពលទឹកប្រាក់របស់ខ្លួនទៅលើអាជ្ញាធរមានសមត្ថកិច្ចដើម្បីបើកផ្លូវឱ្យពួកគេអាចប្រកបរបរតាមចិត្តចង់ ។ នេះជាមូលហេតុដែលធ្វើឱ្យបទបញ្ជារបស់នាយករដ្ឋមន្ត្រីគ្មានប្រសិទ្ធភាព ហើយវាក៏ច្បាស់ជាបន្តធ្វើឱ្យប៉ះពាល់ដល់កំណែទម្រង់របស់រដ្ឋាភិបាល។





ទោះបីជាស្ថានការណ៍ហាក់ដូចជាធូរស្រាលជាងមុនបន្តិចក៏ដោយ ក៏ឈើប្រណីតដែលត្រូវបានគេកាប់ដោយខុសច្បាប់នៅតែត្រូវគេដឹកជញ្ជូនជាហូរហែរតាមគ្រប់មធ្យោបាយៈរថយន្តយោធារថយន្តដឹកអ្នកជំងឺរថយន្តដឹកអ្នកដំណើររហូតដល់រថយន្តទំនើបៗសុទ្ធតែជាមធ្យោបាយដឹកជញ្ជូនដែលគេប្រើប្រាស់ដើម្បីដឹកឈើប្រណីតដើម្បីបន្លំភ្នែកសមត្ថកិច្ច។ ការបំបែកកលល្បិចឈ្មួញទុច្ចរិតបានជាបន្តបន្ទាប់បង្ហាញឱ្យឃើញពីកិច្ចខិតខំប្រឹងប្រែងយ៉ាងខ្លាំងរបស់សមត្ថកិច្ចដែលអនុវត្តបទបញ្ជារបស់នាយករដ្ឋមន្ត្រី។ កិច្ចខិតខំប្រឹងប្រែងនេះគួរតែទទួលបានការលើកទឹកចិត្ត។ ប៉ុន្តែតើមានបរិមាណឈើប៉ុន្មានទៀតដែលពួកឈ្មួញទទួលជោគជ័យក្នុងការបន្លំភ្នែកសមត្ថកិច្ច ហើយដឹកទៅលក់ឱ្យប្រទេសជិតខាង? ម្យ៉ាងទៀតការដេញចាប់ឈើនៅតាមដងផ្លូវគឺជារឿងសំខាន់មួយហើយ ប៉ុន្តែតើហេតុអ្វីបានជាឈើអាចចេញពីព្រៃរួច? នេះគឺជាសំណួរសំខាន់មួយទៀតដែលត្រូវរកចម្លើយ។ សំណួរនេះបានបញ្ជាក់ពីភាពមិនអាចគ្រប់គ្រងព្រៃឈើបានពីសំណាក់សមត្ថកិច្ចរដ្ឋបាលព្រៃឈើ និងសមត្ថកិច្ចគ្រប់លំដាប់ថ្នាក់។



ក្រុមអ្នកតាមដានបញ្ហានេះបានមើលឃើញមូលហេតុច្រើនយ៉ាងដែលនាំឱ្យជំនួញឈើក្លាយជាបញ្ហាមិនអាចគ្រប់គ្រងបាន។ មូលហេតុសំខាន់បំផុតគឺការឃុបឃិតគ្នាជាខ្សែបណ្តាញរវាងឈ្មួញរកស៊ីឈើនិងសមត្ថកិច្ចមួយចំនួនជាពិសេសសមត្ថកិច្ចដែនដីតែម្តង។ រឿងនេះពិតជាមិនពិបាកយល់ឡើយ។ គ្មានឈ្មួញឈើឯណាចេះបំបាំងកាយដើម្បីចូលទៅកាប់ឈើនៅក្នុងព្រៃនោះឡើយ។ ផ្ទុយទៅវិញ ដើម្បីកាប់ឈើបានពួកគេត្រូវការ

តទៅទំព័រទី ៨

## តមកពីទំព័រទី ៧ កាត់បន្ថយឥទ្ធិពលឈ្មួញធំៗជាគន្លឹះ...

មធ្យោបាយសន្ទឹកសន្ទាប់ និងសកម្មភាពគគ្រឹកគគ្រេង ដូចជារណាយន្ត និងរថយន្តសម្រាប់ដឹកឈើជាដើម។ សកម្មភាពទាំងនេះពិតជាមិនអាចធ្វើដោយស្ងាត់ៗបានឡើយ។ បើនិយាយថាសមត្ថកិច្ចមិនអាចចូលដល់ព្រៃជ្រៅដើម្បីពិនិត្យមើលការកាប់ព្រៃឈើរបស់ឈ្មួញបានទេនោះ វារឹតតែជារឿងមិនអាចជឿបានទៅទៀត។ មិនអាចជឿបានដោយហេតុថា ឈ្មួញកាប់ឈើអាចចូលព្រៃជ្រៅបានតែបែរជាសមត្ថកិច្ចមិនអាចចូលបានទៅវិញ។ តាមពិតការកាប់ឈើ មិនមែនជារឿងពិបាកនឹងដឹងនោះឡើយ។ ប្រជាសហគមន៍ព្រៃឈើក៏តែងតែបរិហារអំពីសកម្មភាពកាប់បំផ្លាញព្រៃឈើជាញឹកញាប់ ហើយពួកគេតែងតែនាំគ្នាចូលព្រៃដើម្បីបង្អាក់សកម្មភាពនេះទៀតផង។ ប៉ុន្តែអ្វីដែលគួរឱ្យកត់សម្គាល់នោះ គឺអាជ្ញាធរបែរជាបដិសេធ និងជួនកាលបានរារាំងសកម្មភាពរបស់ប្រជាសហគមន៍ទៅវិញ។ នេះក៏ជាចំណុចគួរឱ្យពិចារណាមួយដែរ។ មូលហេតុសំខាន់មួយទៀតដែលធ្វើឱ្យជំនួញឈើ ឬឈ្មួញធំៗផ្សេងទៀតមិនអាចគ្រប់គ្រងបានគឺឈ្មួញអ្នករកស៊ីទាំងនោះច្រើនតែជាអ្នកមានឥទ្ធិពល ឬមានខ្នងបង្អែករឹងមាំ។ ក្នុងករណីនេះសមត្ថកិច្ចដែនដីគ្មានជម្រើសអ្វីក្រៅពីធ្វើគធ្វើថ្លង់ ឬក៏ទទួលយកផលប្រយោជន៍នោះឡើយ ពីព្រោះតែពួកគេខ្លាចអំណាចបារមីរបស់មន្ត្រីអ្នកមានបុណ្យស័ក្តិធំជាងខ្លួន។ នៅមានករណីកាប់ឈើម្យ៉ាងទៀតដែលគេមិនអាចគ្រប់គ្រងបានដែរនោះគឺការកាប់ឈើដោយស្របច្បាប់តាមរយៈដីសម្បទានសេដ្ឋកិច្ច។ មានដីសម្បទានសេដ្ឋកិច្ចជាច្រើនដែលឈ្មួញបានចំណេញយ៉ាងច្រើនក្រាស់ក្រែលដោយគ្រាន់តែកាប់ឈើលក់។ ទាំងអស់នេះគឺជាមូលហេតុសំខាន់ៗដែលធ្វើឱ្យឈ្មួញមានឥទ្ធិពលជាងបទបញ្ជានាយករដ្ឋមន្ត្រី។ សម្រាប់ក្រុមអ្នកតាមដាន និងវិភាគបញ្ហាសង្គមកម្ពុជា គេមិនអាចបណ្តោយឱ្យបញ្ហានេះស្ថិតក្នុងស្ថានភាពមិនអាចគ្រប់គ្រងបានដូច្នេះទៀតទេ។ មិនបានដោយហេតុថា ទី១ វានឹងធ្វើឱ្យកំណែទម្រង់របស់រដ្ឋាភិបាលសាបរលាបនៅចំពោះមុខមហាជនទូទៅ។ ទី២វានឹងបន្តផ្តល់ផលអាក្រក់យ៉ាងខ្លាំងជាបន្តទៀតដល់គោលនយោបាយដឹកនាំរបស់រដ្ឋាភិបាល ពីព្រោះបញ្ហានេះនៅតែជាប្រធានបទក្តៅមួយដែលរដ្ឋាភិបាលរងការរិះគន់។ និងទី៣ការកាប់បំផ្លាញព្រៃឈើនឹងបង្កើតឱ្យមានវិបត្តិសង្គមធំធេងមួយនៅពេលខាងមុខពីព្រោះតែព្រៃឈើក៏អស់ រីឯប្រជាសហគមន៍ក៏គ្មានទីពឹងសម្រាប់ប្រាស្រ័យផលទៀតដែរ។ ផលវិបាកទាំងនេះមានលក្ខណៈធ្ងន់ធ្ងរគ្រប់គ្រាន់ដែលរដ្ឋាភិបាលត្រូវបន្ថែមទម្ងន់កណ្តាប់ដៃរបស់ខ្លួនក្នុងការកាត់បន្ថយឥទ្ធិពលរបស់ឈ្មួញមួយចំនួន។ ទន្ទឹមនឹងនោះ ការពង្រឹងសមត្ថកិច្ចអាជ្ញាធរគ្រប់លំដាប់ថ្នាក់ឱ្យក្លាយជាសមត្ថកិច្ចបម្រើរាស្ត្រនិងការពារប្រយោជន៍សង្គមក៏ជាកិច្ចការដ៏សំខាន់មួយទៀត។ ការបណ្តែតបណ្តោយបញ្ហានេះរដ្ឋាភិបាលនឹងទទួលរងថ្មបាក់បន្ថែមទៀតជាមិនខាន៕

**ពាក្យគន្លឹះ៖ កម្ពុជា - ព្រៃឈើ**



# ប្រទេសបារាំងពី Bretagne មកដល់ Paris

ដោយ : ពិន សំខុន

ចប់កិច្ចការគ្រួសារចំនួនពីរថ្ងៃយើងនាំគ្នាត្រឡប់មកទីក្រុងប៉ារីសវិញ នាល្ងាចថ្ងៃអាទិត្យ តុលាតាមរថយន្តក្នុងដំណើរ៤ម៉ោងយ៉ាងលឿន មើលទេសភាពជនបទដ៏ត្រកាលនៃតំបន់ប្រីតាញ (Bretagne) ហើយនឹងន័រម៉ង់ឌី (Normandie) ស្ទើរមិនទាន់រួចរាត្រីកាលក៏មកដល់ល្មម ហើយនាំដំណើរមកដល់ប៉ារីសនាម៉ោង១០យប់ ។

ថ្ងៃបន្ទាប់មកសុបិនបានទៅតំបន់ដែលមានហាងធំៗលក់របស់គុណភាពខ្ពស់






នាមហាវិថីដ៏ល្បីល្បាញ "អូស្មាន់" (Boulevard Hausman) ។ នៅទីនោះថ្វីត្បិតតែពុំមែនថ្ងៃសម្រាកតែមនុស្សម្នាក់ជាភ្ញៀវដើរជាន់ជើងគ្នាគ្មានស្រាកម៉ោងណាទេ ទាំងអ្នកធ្វើការទាំងអ្នកដើរកំសាន្តទាំងក្រុមទេសចរណ៍ដើរខ្វាត់ខ្វែងតាមរមណីយដ្ឋានដែលនៅក្បែរៗគ្នា ដូចជា អូប៉េរ៉ា (Opera) អតីតព្រះបរមរាជវាំង(Le Loure) សួនច្បារ (Tuillerie) ស្តូបឡាកុងគ័ដ (La Concorde)... ។ល ។












នៅទល់មុខគ្នាខាងត្បូងនៃទន្លេសែនមានអគារប្រាសាទបូរាណដែលមានសមាជិកសភាធ្វើការនៅទីនោះ មានសារមន្ទីរ និងមហាវិទ្យាល័យធំៗល្បីល្បាញ...ទីនោះគេហៅថា "កាជេឡាកាំង"(Quartier Latin) ដែលសម្បូរណ៍ដោយនិស្សិត យុវជន យុវនារី បញ្ញាវ័ន្ត ដែលកកកុញមកស្វែករកជួបមិត្តសាសន៍ផ្សេងៗ មកបរិភោគម្ហូបរសជាតិប្លែកៗនៃប្រជាជាតិគ្រប់សាសន៍មករកស៊ីនាតំបន់និស្សិត និងបុគ្គលិកសិក្សានាក្រុងប៉ារីស ដែលសូម្បីតែអធ្រាតយប់ជ្រៅណាស់ទៅហើយក៏មានមនុស្សដើរលេងទល់ភ្លឺដែរ ។

យើងចាប់អារម្មណ៍ដល់ភោជនីយដ្ឋានខ្មែរមួយដែរ ដែលទើបមកឈរជើងនៅតំបន់ដែលគេមកកំសាន្តរហូតភ្លឺនោះឈ្មោះ ភោជនីយដ្ឋាន កូឡូនិញាល (Coloniale) ឬឈ្មោះបកប្រែមកថា "ភោជនីយដ្ឋានអាណានិគម" ស្ថិតនៅលេខ២៥ ផ្លូវ Mazarine ។ ឈ្មោះនេះសមនឹងការតុបតែងក្នុងភោជនីយដ្ឋាននេះណាស់ ដោយគេអាចឃើញវត្ថុបូរាណ និងរូបថតជំនាន់បារាំងត្រួតត្រារាប់រយផ្ទាំងតាំងពីជាន់លើរហូតដល់ជាន់ក្រោមធ្វើឱ្យភ្ញៀវមានអារម្មណ៍ថា កំពុងស្រម័យដល់ជំនាន់អាណានិគមមួយរយៈពេលដែលខ្លួនកំពុងបរិភោគម្ហូបអាហារដ៏ប្រណិតបំរើដោយកូនប្រុសខ្មែរ-បារាំងរបស់ម្ចាស់ហាងឈ្មោះ វុធី ក្នុងសំលៀកបំពាក់អាវកត្រង់ពណ៌សរបស់ខ្លួន និងរៀបចំម្ហូបដោយ មឿ ថាក់ណុល អតីតគ្រូបង្ហាត់សាលាវិចិត្រសិល្បៈខ្មែរប្តូរមុខវិជ្ជាមកជាម្ចាស់ភោជនីយដ្ឋានកាលពីប្រមាណ១៥ឆ្នាំមុន ជាមួយភរិយាខ្លួនឈ្មោះ ដូមីនីក ។ នរណាទៅលេងក្រុងប៉ារីសកុំភ្លេចទៅភ្លក់រសជាតិសម័យអាណានិគមខ្មែរនៅភោជនីយដ្ឋាន កូឡូនីញាល់ ព្រោះនេះជាគំរូភោជនីយដ្ឋានតែមួយគត់ដែលពុំដែលជួបប្រទះពីមុនមកនៅឡើយ ទោះជានៅកម្ពុជាក៏ដោយ ។

*លេខក្រោយនឹងនិយាយពីរមណីយដ្ឋានដ៏ត្រកាលបំភ្លេចមិនបាននៃទីក្រុងប៉ារីសជាបន្តទៅ ទៀត ។*

តមកពីទំព័រទី ៥

## រំលឹកទៅរដូវកាលបោះ...

ត្រូវបានចាប់ជំរិតបង្ខំចូលក្នុងឡានដោយជនទំនើង ៤នាក់ ហើយប្រពន្ធរបស់លោកមេហែនបានឃើញព្រឹត្តិការណ៍នោះផ្ទាល់ភ្នែក។ ក្នុងហេតុការណ៍ចាប់ជម្រិតជនទំនើងទាំង៤នាក់បានប្លន់យកនាឡិកាមាស និងលុយចំនួន១៣៧ដុល្លារពីលោកមេហែន។ ពិនិត្យលើលទ្ធផលឆ្នោតលោក មេហែន បេក្ខជនអភិបាលក្រុងដែលត្រូវបានចាប់ជំរិតនោះ បានទទួលសម្លេងបោះឆ្នោតគាំទ្រត្រឹមតែ៤០ប៉ុណ្ណោះ ធ្វើឱ្យមានជាចម្ងល់ពីមូលហេតុនៃហេតុការណ៍ចាប់ជម្រិត ព្រោះបើតាមសម្លេងឆ្នោតដ៏តិចតួចដែលលោកទទួលបានមិនសមនឹងមានហេតុការណ៍ចាប់ជម្រិតនោះកើតឡើងឡើយ ។ ចំណែកជ័យលាភីបានទៅលើលោក ថូម៉ាស ខរបិតធ៍ សម្លេងសរុប១៥៣៩៥ ទល់នឹងគូប្រកួតប្រជែងប្រកៀកនឹងលោក តឹ ថូម៉ាស បាដិន ក្នុងសម្លេង១៥៣០៣។ សូមស្វែងយល់បន្ថែមក្នុងអត្ថបទជាភាសាអង់គ្លេសដែលសរសេរដោយជំនួយការអភិបាលក្រុង ចេនីហ្វ មីយឺរ ៕

Continued from Page 05

## Kidnapping! Libel!...

It appeared the thugs had broken into the apartment by ripping an iron screen off a window accessible from a flat roof one story off the ground.

Candidate Mahan was not seen or heard from that entire day – until it was time for the candidates' forum for Mayoral, City Council and School Committee candidates at the Lowell Memorial Auditorium.

And oh what a forum it was! Let's pause for a moment and let this sink in – 5,000 audience members filled the LMA, while another 6,000 were outside "clamoring for admission." ELEVEN THOUSAND people turned out for a candidates forum!

In the last six years, I cannot recall a forum that has drawn more than 100 gawkers.

Anyway, back to Mahan. He was one of 10 candidates in the mayoral primary. He reemerged from his kidnapping ordeal just in time for the forum, sporting a lump under one eye.

He told the crowd four men, one who jammed a gun into his side, had nabbed him, bound and gagged him, then stole $137 and his gold watch.

"He asked for a cigarette and they blew smoke in his face," the Sun reported. "They kicked him in the face."

Mahan said the outlaws drove him around for several hours and then left him in an abandoned house near Providence, Rhode Island. At noon he managed to untie himself, hitch a ride on a truck to Milton, then one to Boston and finally one to Lowell.

"His clothes were torn to shreds," the Sun reported.

Being kidnapped by bandits wasn't the only trouble candidate Mahan got himself into that day. During his speech at the candidates' forum, Mahan referred to LPD Officer Alfred J. Cooney of the Vice Squad as having been the "ticket taker at a camp in Tyngsboro where booze was being sold and a hula hula dancer was entertaining."

Cooney said the comments were libelous and filed an internal complaint against Mahan, who was suspended without pay for six months by LPD Superintendent Hugh Downey. When the six months was up, the state's Civil Service Commission refused his reinstatement, extending the suspension by an additional six weeks.

And in case you were wondering, Mahan was not successful in his mayoral bid. In fact, he only received 40 votes. The two candidates who survived the primary were Thomas Corbett (7,054 votes) and Thomas Braden (6,045 votes).

Corbett claimed victory in the December 7 general election, following a week-long recount, with a vote tally of 15,395 to 15,303.

តមកពីទំព័រទី ៦

## ឡូវែលគណ...

វីដេអូថតក្នុងវត្ត បែកបាក់គ្នានៅសមាគមនឹងក្រុងខ្មែរ...។ល។ គេពុំបានឃើញជំហរអាជ្ញាធររបស់ វ៉ាស្នា នួន សម្រាប់ព្យាបាលជម្ងឺបែកបាក់ឱ្យបានច្បាស់លាស់ទេ ។

**៦-ឃោសនាផ្សេង** រិទ្ធិ អ៊ុង ជាអតីត (កុងស៊ុល័រ) មានឈ្មោះល្បីល្បាញក្នុងសហគមន៍បានជួយធ្វើការឃោសនាឱ្យ វ៉ាស្នា នួន តែលោកកុងស៊ុល័រ ចាស់នោះស្ថិតនៅក្នុងការបែកបាក់វត្តត្រែរតនារាមជាសមាជិកគណកម្មការវត្តកូតាវត្តសហគមន៍ព្រះសង្ឃខ្មែរ ដែលទើបចាក់ចេញទៅដីថ្មី ដែលជាហេតុធ្វើឱ្យគេយល់ច្រឡំថា វ៉ាស្នា នួន ផ្សេងខាតសន្លឹកឆ្នោតមួយដុំទៀត ។

ការវិភាគដែលជាស្មារតីធម្មតារបស់សារព័ត៌មាន មានបំណងកត់ត្រាជាការចង់ចាំសម្រាប់យកទៅប្រើប្រាស់ឱ្យបានជោគជ័យនៅ២ឆ្នាំខាងមុខទៀត ពេលដែលក្រុម កុងស៊ុល័រជាអាជ្ញាធរកំពូលថ្មីនេះចប់អណត្តិទៅ។

វ៉ាស្នា នួន បានធ្វើអ្វីដែលក្រុមខ្លួនបានត្រូវធ្វើជូនសហគមន៍រួចហើយ សហគមន៍មានសិទ្ធិនឹងវិនិច្ឆ័យ តែត្រូវការឱ្យ វ៉ាស្នា នួន បន្តរណែនាំក្នុងនាមជាអ្នកមានបទពិសោធន៍ជាងគេឱ្យមានអ្នកឈរឈ្មោះឱ្យប្រជាពលរដ្ឋឡូវែលបោះឆ្នោតនៅពេលខាងមុខទៀត ៕

តមកពីទំព័រទី ១

## វត្តត្រៃរតនារាមត្រូវបិទទ្វារ...

ជិតគ្រប់១៥ឆ្នាំហើយ ដែលវត្តត្រៃរតនារាមមានរឿងវិវាទ បន្ទាប់ពីវត្តមួយនេះបានចែកជាសហគមន៍២ដាច់ពីគ្នាក្នុងឈ្មោះវត្តតែមួយហៅថា វត្តលើ និងវត្តក្រោមពេលណានោះ ។ ទោះជាយ៉ាងនេះក្តីក៏នៅមានប្រជាពុទ្ធបរិស័ទមកធ្វើបុណ្យយ៉ាងកកកុញ ហើយប្រកាន់ថា វត្តនេះជាវត្តរបស់ខ្លួនជារៀងៗខ្លួន ។ ធ្វើបុណ្យដាក់បាត្រសង្ឃាត់ចាប់កុសលបង់ថ្លៃមេធាវីការពារក្តីក្នុងវត្តនីមួយៗជាង១លានដុល្លាររួចទៅហើយៗក៏មិនមានសង្ឃឹមថា ចប់ឆាប់ៗនេះទេ ។

យើងបានសុំជួបគណកម្មការវត្តក្រោមដំណាងដោយលោក សាន ប៊ុន ជាប្រធានលោក ដារ៉ា រិទ្ធ និងលោក កុសល ជាសមាជិក នៅទីសំណាកថ្មីផ្លូវ Stevin ថ្ងៃទី១ វិច្ឆិកា ជួបគណកម្មការវត្តលើដំណាងដោយលោក ប្រាហ៊ុម កែ និងអង្គប្រជុំប្រចាំសប្តាហ៍ចំនួន២២រូប នៅកុដិតូចនៃវត្តត្រៃរតនារាមដែលគ្មានប៉ះពាល់ការបិទថ្ងៃទី៣ វិច្ឆិកា ២០១៣ ដើម្បីស្វែងរកការពិតជូនលោកអ្នកអានជាពិសេស ជូនពុទ្ធបរិស័ទជើងវត្តត្រៃរតនារាមឱ្យបានជ្រាបថា ព្រឹត្តិការណ៍ថ្ងៃទី៨នោះ កើតរបៀបណា? លទ្ធផលបានដូចតទៅ :

### ព្រឹត្តិការណ៍បណ្តាលឱ្យបិទវត្ត :

មានជាង៣រូបជាពុទ្ធបរិស័ទកំពុងធ្វើការជួសជុលកែលំអរអគារក្នុងវត្តខាងលើ បានប៉ះពាល់ដល់សម្ភារៈការពារភ្លើងឆេះ Alarm detection ស្ថិតនៅពិដាន បណ្តាលឱ្យកណ្តឹងអាសន្នរោទិ៍ឡើង កណ្តឹងរោទិ៍នោះមានភ្ជាប់ការហៅរកសង្គ្រោះទៅកងពន្លត់ភ្លើង និងកងប៉ូលិសជាស្វ័យប្រវត្តិ ប្រមាណម៉ោង៦ល្ងាច នាថ្ងៃទី៨ តុលា នោះ ។ លោក សាន ប៊ុន ប្រធានវត្តក្រោម និងសហការីបានឡើងទៅមើលពិនិត្យមើលហេតុដែលនាំឱ្យកណ្តឹងរោទិ៍ឡើងដោយអចេតនា និងឃើញការ



ប្រាហ៊ុម កែ ( កំពុងសរសេរ )និងគណកម្មការវត្តលើ



លោក សាន ប៊ិន ( កណ្តាល) និងគណកម្មការវត្តក្រោម

ជួសជុលវត្តខាងលើដោយជាងទាំង៣រូប ។ កងពន្លត់ភ្លើង និងប៉ូលិសប្រកបដោយរថយន្តធំតូចដូចសព្វមួយដងបានមកដល់ឆែកឆេររកប្រភពអគ្គីភ័យជាហេតុបណ្តាលឱ្យ"កណ្តឹងអាសន្ន"រោទិ៍ឡើងពុំមានឃើញគ្រោះថ្នាក់ ឬអគ្គីភ័យឆ្មើមឡើង ក៏ត្រៀមខ្លួនត្រឡប់ទៅវិញ ដោយរំលឹកឱ្យហៅអ្នកឯកទេសមកជួសជុលកណ្តឹងអាសន្នឡើងវិញនៅថ្ងៃស្អែកព្រឹក ។ ក៏ប៉ុន្តែជាមួយគ្នានោះ មានបណ្តឹងពីរសំដៅទៅរកការឆែកឆេរឱ្យបានជ្រៅអំពីការងារជួសជុលដែលកំពុងធ្វើដោយខ្វះការធានាសុវត្ថិភាពដល់អ្នកប្រើប្រាស់អគារលើ - ក្រោមទាំងអស់គ្នា ។ បន្តិចក្រោយមកមេប៉ូលិស និង"អាំងស្បែកទ័រ"សាលាក្រុងក៏មកដល់ គេបានរកឃើញការជួសជុលកែទម្រង់អគារដោយគ្មានការអនុញ្ញាតិ ឃើញការតខ្សែភ្លើងខុសច្បាប់ ការផ្តាច់ភ្លើងពីក្រោមមកលើ( ដាច់ពីពេលមានវន្ទះបាញ់ច្រើនខែមុនមិនបានភ្ជាប់មកវិញ) និងបង្កើតកន្លែងដេក៦បន្ទប់នៅជាន់ក្រោមដោយគ្មានការអនុញ្ញាតិ( ខាងលើក៏ធ្លាប់មានបន្ទប់ដេកដែរ តែដោយសារគ្មានភ្លើងគ្មានកំដៅគ្រប់គ្រាន់ក៏នាំគ្នាទៅនៅកុដិតូចទាំងអស់) ។ សាលាក្រុងបានចេញបញ្ជាឱ្យបិទអាគារលើក្រោមនៃវត្តត្រៃរតនារាមជាបន្ទាន់នៅម៉ោង៨យប់នោះ ដោយយោងទៅតាមការរំលោភច្បាប់ និងការព្រមានដែលធ្លាប់មានរួចមកហើយ តែមិនបានបញ្ជាឱ្យបិទកុដិតូចដែលនៅ២៥ផ្លូវ Quickly ក្បែរគ្នានោះទេ ។ យប់នោះព្រះសង្ឃបីអង្គនៃវត្តក្រោមមិនបានទទួលការអនុញ្ញាតិឱ្យមករួមរស់នៅជាមួយព្រះសង្ឃឯទៀត៥អង្គនៃវត្តខាងលើនាកុដិតូចនោះទេ ។ ព្រះសង្ឃទាំងបីអង្គបានត្រូវនិមន្តទៅសំរាកជាបណ្តោះអាសន្ននៅផ្ទះលោក នាគ កុសល ផ្លូវ Stevin ទាំងយប់រត់ប្រសាចយកឥវ៉ាន់មិនទាន់ដូចមានភ្លើងឆេះមក ។ យាយជីច្រើនរូបក៏បានត្រឡប់ទៅក្រុមគ្រួសារខ្លួនវិញនារាត្រីនោះដែរ ។

### គម្រោងបើកវត្តឡើងវិញត្រូវបរាជ័យ

ការបើកវត្តត្រៃរតនារាមឱ្យប្រើប្រាស់ឡើងវិញ អាចនឹងធ្វើទៅបានលុះណាតែគណកម្មការទាំងលើទាំងក្រោមនាំគ្នាបំពេញការងារជួសជុលកែតម្រូវស្របតាមច្បាប់បទបញ្ជាក្រុងមកវិញ ដូច្នេះហើយវត្តលើតំណាងដោយលោក ប្រាហ៊ុម បានទៅសុំការអនុញ្ញាតិធ្វើការងារជួសជុលកែតម្រូវឡើងវិញ តែវត្តក្រោមបានប្តឹងជំទាស់ភ្លាមដោយចោទថា សុំច្បាប់ធ្វើការងារក្នុងនាម "វត្តសហគមន៍ព្រះសង្ឃខ្មែរដឹកនាំដោយព្រះតេជគុណ សៅ ឃន ទៅវិញ ច្បាប់នោះក៏ត្រូវផ្អាកសុពភាពទៅវិញ ។ គណកម្មការវត្តលើបាននិយាយថា "ពុំមានចេតនាបន្តទំនាក់ទំនង និងវត្តសហគមន៍ព្រះសង្ឃអីទេ តែដោយសារវត្តនោះបានក្លាយជាម្ចាស់មួយរយៈឈ្មោះចារនៅក្នុងកុំព្យូទ័រក្រុង គឺនៅក្នុងឈ្មោះវត្តសហគមន៍ព្រះសង្ឃខ្មែរនៅឡើយ ហេតុនេះហើយបានជា "Permit នៅឈ្មោះចាស់" ក្រុមវត្តលើឆ្លៀតធ្វើសេចក្តីប្រកាសជាឧឡារិកថា កិច្ចការក្នុងវត្តនេះពុំមានជាប់ទាក់ទិនអ្វីជាមួយវត្តព្រះតេជគុណ សៅ ឃន អ្វីទៀតទេ តាំងពីព្រះសង្ឃចាកចេញទៅកាន់វត្តថ្មីទៅ ។ រីឯស្ថានភាពថ្មីគឺជាប់តាំងដោយគ្មានច្បាប់អនុញ្ញាតិឱ្យជួសជុល ហើយបើមានទៅវិញក៏នៅតែមិនអាចចេញចូលបានដោយសារបំរាម និងទំនាស់វត្តលើ -វត្តក្រោមៗដូចនេះ មកទល់ថ្ងៃនេះពុំទាន់មានដំណោះស្រាយណាមួយសម្រាប់បើកវត្តវិញនៅឡើយទេ ។

### ពិធីសាសនារាល់ថ្ងៃ

វត្តត្រៃរតនារាមធ្លាប់មានពុទ្ធបរិស័ទគាំទ្ររាប់ពាន់នាក់នាពេលមុនៗចំនួននេះបានចុះថយនៅ២០០នាក់ពេលកើតរឿងរ៉ាវបែកបាក់សាមគ្គីគ្នា ។ ឥឡូវនេះមានការលំបាកនឹងរកពុទ្ធបរិស័ទ៥០នាក់មកធ្វើបុណ្យទៅហើយ ។ នឹងទទួលភ្ញៀវនៅកន្លែងសំណាកសព្វថ្ងៃពុំមែនជាទីសាធារណស្របច្បាប់ចំពោះវត្តទាំងពីរខាង ។ គណកម្មការទាំងពីរខាងបានធ្វើរោងនៅខាងក្រៅផ្ទះសម្រាប់ទទួលភ្ញៀវពិធីពុទ្ធសាសនានៅខាងផ្លូវ Stevin រោងតូចពុំមានទីធ្លាទូលាយទេ រីឯកុដិតូចត្រៃរតនារាមរោងធំជាងបន្តិច ហើយទីធ្លាធំទូលាយ ។ យើងដឹងថា បើមានពិធីធំដុំដូចជាបុណ្យកឋិន ឬបុណ្យភ្ជុំបិណ្ឌជាដើមក្រុមនីមួយៗនឹងជួលសាលដូចជាហាងសំពៅមាសសំរាប់យកថវិកាទៅរៀបចំពិធីនោះ ដើម្បីធានាថវិកាប្រចាំឆ្នាំរបស់ខ្លួន ។ វត្តក្រោមនិយាយថា "បានចេញថ្លៃទឹកភ្លើងកំដៅជំនួសវត្តទាំងក្រោមទាំងលើចំនួនច្រើនឆ្នាំមកហើយ" រីឯវត្តលើក្នុងកិច្ចប្រជុំរបស់ខ្លួនទទួលស្គាល់ថា "វត្តក្រោមមិនដែលបង្ហាញវិក័យប័ត្រឱ្យជួយចេញចំណាយទាំងនោះទេ ពេលនេះនិយាយថា វត្តលើនៅជំពាក់ថ្លៃភ្លើង៤ខែហើយ និងត្រូវចំណាយលើ"អ៊ិនសួរិន"សម្រាប់ខែនេះទៀត" ។

### សហគមន៍ខ្មែរព្រាំព្រាដោយអ្នកគ្រប់គ្រងវត្តអារាម :

ថ្វីត្បិតតែវត្តលើ និងវត្តក្រោមមានការគាំទ្រកោតសរសើរពីស្នាដៃថែរក្សាអារាមតែរៀងៗខ្លួនក្តី ខ្មែរជាទូទៅរាប់ម៉ឺននាក់ទៀត បានមើលឃើញភាពអវត្តមាននៃការបិទវត្តត្រៃរតនារាមរាប់ថា ជាភាពអម៉ាសថ្មីមួយទៀតរបស់សហគមន៍ខ្មែរនៅឡូវែលនេះ ។ ក្រុមប្រឹក្សាវប្បធម៌ខ្មែរតំណាងដោយលោក ចាន់ ថា គិម បាននិយាយថា "បានខិតខំបញ្ចុះបញ្ចូលឱ្យមានទំនាក់ទំនងល្អរវាងវត្តលើ និងវត្តក្រោម ដូចជាចរចាឱ្យអាចបន្តភ្លើងឡើងប្រើប្រាស់ខាងលើ ខាងក្រោមយល់ព្រមខាងលើបដិសេធរហូតដល់មានចរន្តភ្លើងខុសច្បាប់បណ្តាលឱ្យគេបិទវត្ត គួរឱ្យស្តាយដល់ទំនាស់ដែលរិតតែបំបែកវត្តឱ្យរិតតែបែកគ្នាកាន់តែឆ្ងាយ" ៕

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បត៍ ទី០៧ ខែវិច្ឆិកា ឆ្នាំ២០១៣

# សេចក្ដីព្រាងថវិកាឆ្នាំ២០១៤ឆ្លងផុតជុំដំបូងនៅរដ្ឋសភាឯកបក្ស ខណៈបក្សប្រឆាំងនៅតែអវត្តមាន

ដោយ: Hul Reaksmey and Zsombor Peter - November 5, 2013

ទោះបីជានៅតែមិនមានវត្តមានចូលរួមពីសំណាក់គណបក្សសង្គ្រោះជាតិក៏ដោយ ក៏សេចក្ដីព្រាងថវិកាចំនួន៣៥៤លានដុល្លារសម្រាប់ឆ្នាំ២០១៤បានឆ្លងផុតដំណាក់កាលថ្មីមួយទៀតក្នុងដំណើរក្លាយជាច្បាប់កាលពីម្សិលមិញនៅពេលតំណាងរាស្ត្រមកពីគណបក្សប្រជាជនកម្ពុជាបានបញ្ជូនសេចក្ដីព្រាងថវិកាចំណាយទៅគណៈកម្មាធិការសេដ្ឋកិច្ច ហិរញ្ញវត្ថុ ធនាគារ និងសវនកម្មនៃរដ្ឋសភាសម្រាប់ដំណើរការអនុម័ត។

លោក ជាម យៀប តំណាងរាស្ត្រ និងជាអ្នកនាំពាក្យគណបក្សប្រជាជនកម្ពុជា និងជាប្រធានគណៈកម្មាធិការសេដ្ឋកិច្ច ហិរញ្ញវត្ថុ ធនាគារ និងសវនកម្មនៃរដ្ឋសភាបានឱ្យដឹងថា ដំណាក់កាលអនុម័តគឺជាដំណាក់កាលចុងក្រោយមុនពេលសេចក្ដីព្រាងនេះត្រូវបានលើកទៅដាក់ក្នុងកិច្ចពិភាក្សាដេញដោលពេញលេញ និងបោះឆ្នោតដោយរដ្ឋសភា។ ក៏ប៉ុន្តែគណបក្សសង្គ្រោះជាតិនៅតែបដិសេធមិនទទួលយកអាសនៈទាំង៥៥របស់ខ្លួនដោយសារបច្ចុប្បន្នមានវិវាទជាមួយគណបក្សប្រជាជនកម្ពុជាជុំវិញសុពលភាពនៃការបោះឆ្នោតជាតិកាលពីខែកក្កដា។

លោក ជាម យៀប បានលើកឡើងថា សេចក្ដីព្រាងថវិកានេះត្រូវបានបញ្ជូនទៅគណៈកម្មាធិការរបស់លោកហើយ ដោយមិនមានការផ្លាស់ប្ដូរទេបន្ទាប់ពីគណៈកម្មាធិការអចិន្ត្រៃយ៍នេះបានបញ្ចប់កិច្ចប្រជុំរបស់ខ្លួនកាលពីម្សិលមិញ ដោយមានវត្តមានចូលរួមរបស់ប្រធានគណៈកម្មាធិការអចិន្ត្រៃយ៍ទាំងប្រាំបួននៃរដ្ឋសភា លោក ហេង សំរិន ប្រធានរដ្ឋសភា និងអនុប្រធានរដ្ឋសភាទាំងពីររូបដែលសុទ្ធតែជាសមាជិកគណបក្សប្រជាជនកម្ពុជា។

លោក អូន ព័ន្ធមុនីរ័ត្ន រដ្ឋមន្ត្រីក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុនឹងឆ្លើយសំណួររបស់គណៈកម្មាធិការសេដ្ឋកិច្ច ហិរញ្ញវត្ថុ ធនាគារ និងសវនកម្មទាក់ទងនឹងសេចក្ដីព្រាងថវិកានេះនៅថ្ងៃស្អែក។ លោក ជាម យៀប បានមានប្រសាសន៍ថា "ខ្ញុំបានទូរស័ព្ទទៅឯកឧត្ដម អូន ព័ន្ធមុនីរ័ត្ន ដើម្បីសាកសួរគាត់ថា តើឯកឧត្ដមអាចឡើងការពារសេចក្ដីព្រាងថវិកានេះ នៅខានស្អែកឱ្យថ្ងៃពុធបានដែរឬអត់។ ឯកឧត្ដមអាចឡើងការពារនៅពេលនោះបាន"។ លោក អូន ព័ន្ធមុនីរ័ត្ន មិនអាចទំនាក់ទំនងធ្វើសេចក្ដីអត្ថាធិប្បាយបានទេ។

ទាំងក្រសួងសេដ្ឋកិច្ច និងហិរញ្ញវត្ថុ រដ្ឋសភា ទាំងខុទ្ទកាល័យលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ដែលបានអនុម័តសេចក្ដីព្រាងថវិកានេះកាលពីខែមុននោះ មិនបានផ្ដល់ព័ត៌មានលម្អិតទាក់ទងនឹងរបៀបរបបចំណាយថវិកានេះទេ។ គួរកត់សម្គាល់ថា ថវិកានេះមានចំនួនច្រើនជាងថវិកាសម្រាប់ឆ្នាំ២០១៣ចំនួនប្រមាណជា៤០០លានដុល្លារសហរដ្ឋអាមេរិក។ តទៅទំព័រទី១៣

# National Assembly's Finance Committee Approves 2014 Budget

By Kuch Naren and Hul Reaksmey - November 7, 2013

The National Assembly's CPP-run finance committee approved the country's $3.54 billion draft budget for 2014 Wednesday, its last hurdle before debate and a possible vote can be held by the full Assembly, where the opposition is still refusing to take nearly half the seats.

Still refraining to divulge any details about the hefty spending bill, finance committee chairman and CPP lawmaker Cheam Yeap said the draft was approved after four hours of questions put to Finance Minister Aun Porn Moniroth.

"After the discussion and questions about this law we approved it and sent it to the [Assembly's] plenary session," he said.

Mr. Yeap said the plenary session would take place early next week, where it will be opened for debate and a possible vote.

"We can't say how much money we will spend [on each ministry] now, so please wait until the plenary session takes place. We will distribute this law after that meeting," he said.

An official inside the Assembly's information office, who spoke on the condition of anonymity as he is not authorized to speak to the media, said the session had been scheduled for Tuesday.

Mr. Porn Moniroth and other officials at the Finance Ministry could not be reached for comment.

The government has been drafting the budget in complete secrecy and without any input from the opposition CNRP, which won 55 of the Assembly's 123 seats in July's national election but is boycotting parliament to protest what it says was a fraudulent vote.

"In good practice the government needs to release the draft budget in order to have a public consultation," said Chhith Sam Ath, executive director of NGO Forum. "The budget is the budget of the Cambodian people and they need to know what and where their money is going to be spent, if it is going to be in their interest."

Past budgets have been criticized by the opposition and the country's foreign donors for not allocating enough to the health and education sectors.

# ការិយាល័យ UN: ២០១២ជាឆ្នាំរឹបអូសថ្នាំញៀនបានច្រើនបំផុតនៅកម្ពុជា

ដោយ Lauren Crothers - November 8, 2013

ការិយាល័យសហប្រជាជាតិទទួលបន្ទុកដោះស្រាយថ្នាំញៀន និងបទល្មើស ហៅកាត់ថា NODC បានលើកឡើងនៅក្នុងរបាយការណ៍ថ្មីមួយចេញផ្សាយនៅថ្ងៃនេះថា ឆ្នាំ២០១២ គឺជាឆ្នាំដែលរឹបអូសបានថ្នាំញៀនមេតំហ្វេតាមីន និងកូកាអ៊ីនបានច្រើនបំផុតនៅក្នុងប្រទេសកម្ពុជាដែលបន្តក្លាយជាគោលដៅរបស់ក្រុមជួញដូរគ្រឿងញៀនឆ្លងដែន និងអាស៊ីសម្រាប់ការផលិតថ្នាំញៀន។

របាយការណ៍ដែលមានចំណងជើង"លំនាំ និងនិន្នាការនៃផលលំបាកបង្កឡើងដោយថ្នាំរំញោចប្រភេទអំហ្វេតាមីន និងថ្នាំញៀនផ្សេងៗទៀតសម្រាប់តំបន់អាស៊ី និងប៉ាស៊ីហ្វិកឆ្នាំ២០១៣" ក៏លើកឡើងដែរថា ប្រទេសកម្ពុជាជាចំណុចក្ដៅមួយសម្រាប់ការផលិត និងការឆ្លងកាត់នៃថ្នាំរំញោចប្រភេទអំហ្វេតាមីន (ATS) និងថ្នាំញៀនផ្សេងៗទៀតហើយថា ការប្រើប្រាស់ថ្នាំញៀនមេតំហ្វេតាមីនទាំងប្រភេទម្សៅទាំងប្រភេទគ្រាប់កំពុងតែកើនឡើង។

របាយការណ៍នេះបន្តថា "ការរឹបអូសមេតំហ្វេតាមីន និងកូកាអ៊ីនប្រភេទម្សៅនៅក្នុងប្រទេសកម្ពុជាក្នុងឆ្នាំ២០១២ មានចំនួនច្រើនបំផុតដែលមិនធ្លាប់ធ្វើសេចក្ដីរាយការណ៍ពីមុនមកនៅក្នុងប្រទេសនេះ។ ការផលិតការជួញដូរ និងការប្រើប្រាស់ ATS មានចំនួនច្រើន ហើយកំពុងក្លាយជាបញ្ហាដែលកាន់តែពិបាកដោះស្រាយខ្លាំងឡើងៗនៅក្នុងប្រទេសកម្ពុជា"។

UNODC បានលើកឡើងថា "មួយភាគធំនៃកូកាអ៊ីនរត់ពន្ធចូលក្នុងប្រទេសកម្ពុជាមានគោលដៅឆ្ពោះទៅប្រទេសថៃ និងទីផ្សារផ្សេងៗទៀតនៅក្នុងតំបន់។ ការិយាល័យនេះបានបន្តថា កូកាអ៊ីនប្រមាណ៤១គីឡូក្រាមត្រូវបានរឹបអូសកាលពីឆ្នាំមុន ពោលគឺកើនឡើងពី១.១គីឡូក្រាមនៅក្នុងឆ្នាំ២០១១។របាយការណ៍នេះក៏បានលើកឡើងដែរថា ក្នុងឆ្នាំ២០១២ មេតំហ្វេតាមីនប្រភេទម្សៅសរុប៣៣.៥គីឡូក្រាមត្រូវបានរឹបអូស តទៅទំព័រទី ២៣

# UN Says 2012 Set Record for Cambodia Drug Busts

*By Lauren Crothers - November 8, 2013*

There were record numbers of seizures of crystal methamphetamine and cocaine last year in Cambodia, which continues to be targeted by transnational and Asian drug trafficking groups for the production of illicit drugs, the U.N. Office of Drugs and Crime (UNODC) said in a new report released Friday.

The report, entitled Patterns and Trends of Amphetamine-Type Stimulants and Other Drugs—Challenges for Asia and the Pacific 2013, also states that Cambodia is a hotbed for the manufacture and transit of am-phetamine-type stimulants (ATS) and other illegal drugs and that the use of meth-amphetamine in both crystalline and pill form is on the rise.

"Crystalline methamphetamine and cocaine seizures in Cambodia in 2012 are the highest ever reported from the country. The manufacture, trafficking and use of ATS is significant and is becoming increasingly problematic in Cambodia," the report says.

"A large share of cocaine smuggled into Cambodia is destined for Thailand and other markets in the region," the UNODC said, adding that some 41 kg of co-caine was seized last year, up from 1.1 kg in 2011.

The report also says that in 2012 a total of 33.5 kg of crystalline metham-phetamine was seized, a 75 percent increase compared to the previous year when 19.1 kg was seized.

"This signifies the highest amount ever reported by the country," the report says.

In addition, "a large and growing majority of persons arrested for drug-related offenses or persons submitted for drug treatment in-volve methamphetamine," it continues.

The rise in seizures was evident in the raids of a "significant number" of labs producing either precursor chemicals such as safrole oil, an ingredient that can be found in the meas prov tree, as well as methamphetamine and MDMA. Most of these labs were in Phnom Penh.

"[H]owever, due to the paucity of data, the full extent of illicit drug manufacture in Cambodia is unknown," the report says.

Still, "Transnational organized crim -inal groups, particularly from Asia and West Africa, continue to use Cambodia to manufacture and tran-sit ATS, their pre-cursor chemicals, and other illicit drugs such as co-caine and heroin," the report states. Continued to Page 18

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ព្រហស្បតិ៍ ទី០៧ ខែវិច្ឆិកា ឆ្នាំ២០១៣

# លោក សុខ គង់: ទីតាំងដីដ៏ធំនៅជិតវត្តឧណ្ណាលោម នឹងប្រើប្រាស់សម្រាប់គម្រោងអភិវឌ្ឍន៍

eday Aun Pheap and Joshua Wilwohl - October 30, 2013

ប្រធាននាយកប្រតិបត្តិក្រុមហ៊ុនសូគីម៉ិចគ្រុប (Sokimex Group) បានឱ្យដឹងកាលពីម្សិលមិញថា ទីតាំងដីដែលមានទំហំ៥.០០០ម៉ែត្រក្រឡារបស់ក្រុមហ៊ុនពហុជំនួញក្នុងស្រុកនេះ ដែលស្ថិតនៅតាមបណ្ដោយផ្លូវ១៥៤ក្បែរវត្តឧណ្ណាលោម និងផ្សារកណ្ដាលអាចជាទីតាំងថ្មីមួយសម្រាប់គម្រោងសណ្ឋាគារដែលមានច្រើនជាន់។

លោក សុខ គង់ ប្រធាននាយកប្រតិបត្តិក្រុមហ៊ុនសូគីម៉ិចបានឱ្យដឹងកាលពីម្សិលមិញថា គម្រោងសាងសង់សណ្ឋាគារនៅលើទីតាំងដែលនៅក្បែរសណ្ឋាគារ Amanjaya Pancam និងមានទំហំស្មើនឹងមួយប្លុកនេះ គិតពីផ្លូវ១៥៤ ទៅដល់ផ្លូវ១៤៨ ត្រូវបានលើកពេលអនុវត្ត ដោយសារតែស្ថានភាពនយោបាយមិនសូវអំណោយផលនាពេលបច្ចុប្បន្ន។

លោក សុខ គង់ បានមានប្រសាសន៍ថា "ដីនេះជារបស់ខ្ញុំ ហើយយើងមានគម្រោងសង់សណ្ឋាគារមួយ ក៏ប៉ុន្តែយើងបានព្យួរគម្រោងនេះសិន?ដោយសារយើងបារម្ភអំពីបាតុកម្ម" ក្រោយថ្ងៃបោះឆ្នោតជាតិកាលពីខែកក្កដា។ លោក សុខ គង់ បានឱ្យដឹងបន្ថែមទៀតថា មុននិងក្រោយពេលបោះឆ្នោតតំណាងក្រុមហ៊ុនកូរ៉េមួយ និងក្រុមហ៊ុន ជប៉ុនមួយបានពិភាក្សាជាមួយលោកអំពីផែនការទិញដីនេះ ដើម្បីសង់សណ្ឋាគារ ក៏ប៉ុន្តែពួកគេមិនបានត្រឡប់មកវិញទេ បន្ទាប់ពីកិច្ចពិភាក្សាលើកដំបូង។

លោកលើកឡើងថា ក្រុមហ៊ុនរបស់លោកបានវាយកម្ទេចចោលហាងលក់គ្រឿងបន្លាស់ទូរស័ព្ទដ៏ធំមួយ ដែលពីមុនស្ថិតនៅលើទីតាំងដីនេះ ហើយបានវាយកម្ទេចហាងតូចៗផ្សេងទៀត ដើម្បីរៀបចំដីនេះសម្រាប់លក់។ លោកបានមានប្រសាសន៍ថា "យើងគ្រាន់តែបានកម្ទេចអគារនេះ និងហាងអាជីវកម្មផ្សេងៗចេញពីដីនេះ ដើម្បីរៀបចំសម្រាប់លក់... ក៏ប៉ុន្តែយើងមិនបានលក់ដីនេះទេ"។

លោក សុខ សម្បត្តិ អភិបាលខណ្ឌដូនពេញបានឱ្យដឹងថា លោក សុខ គង់ បានលក់ដីនេះទៅឱ្យក្រុមហ៊ុនកូរ៉េដែលបាន និងកំពុងមានគម្រោងសាងសង់សណ្ឋាគារ និងការិយាល័យលើទីតាំងនោះ។ លោក សុខ សម្បត្តិ មានប្រសាសន៍ថា "ដីនេះជារបស់ឧកញ៉ា សុខ គង់ ក៏ប៉ុន្តែគាត់បានលក់វាឱ្យក្រុមហ៊ុនកូរ៉េ កាលពីប៉ុន្មានខែមុនហើយ។ ម្ចាស់ក្រុមហ៊ុននោះកាលពីពេលថ្មីៗនេះបានមកជួបខ្ញុំ និងពិភាក្សាគ្នាអំពីគម្រោងសាងសង់នេះ ដើម្បីសាងសង់សណ្ឋាគារដ៏ខ្ពស់មួយ និងអគារមួយសម្រាប់ធ្វើជាការិយាល័យក្រុមហ៊ុនផ្សេងៗ"។

នៅឯទីតាំងដីនោះកាលពីម្សិលមិញរបងអាលុយមីញ៉ូមបានព័ទ្ធជុំវិញដីនោះ និងស្លាកសញ្ញានៅច្រកចូលសម្រាប់ណែនាំអតិថិជនឱ្យចូលទៅក្នុងទីតាំងហាងលក់ទូរស័ព្ទថ្មី។ អ្នកលក់ដូរនៅតាមផ្លូវកាលពីថ្ងៃច័ន្ទ និងម្សិលមិញបានឱ្យដឹងថា ពួកគាត់បានរើចេញពីទីតាំងដីនោះទៅកន្លែងថ្មីរជើង ។ កាលពីដើមឆ្នាំនេះក្រុមហ៊ុនសូគីម៉ិចបានចាប់ផ្ដើមរើអាជីវកម្មផ្សេងៗចេញពីទីតាំងដីរបស់ខ្លួនសម្រាប់គម្រោងអភិវឌ្ឍន៍ និងសាងសង់សណ្ឋាគារ១៥ជាន់ ដែលទទួលបានការគាំទ្រពីសមភាគីចិន ហើយនៅក្នុងសណ្ឋាគារនោះនឹងមានហាងទំនើបៗ និងផ្សារទំនើប ៕

**សុធា**

# បរិមាណនាំចេញអង្ករកើនឡើង១០១ភាគរយ ក្នុងរយៈពេល១០ខែដំបូងនៅឆ្នាំនេះ

ដោយ George Styllis - November 8, 2013

យោងតាមតួលេខសហព័ន្ធអ្នកនាំអង្ករចេញកម្ពុជាបានបង្ហាញថា បរិមាណនាំអង្ករចេញពីប្រទេសកម្ពុជាបានកើនឡើងទ្វេដងនៅក្នុងរយៈពេល១០ខែដើមឆ្នាំនេះ បើធៀបនឹងរយៈពេលដូចគ្នាកាលពីឆ្នាំមុន ហើយប្រទេសប៉ូឡូញជាអ្នកនាំចូលអង្ករច្រើនជាងគេ។

បរិមាណនាំអង្ករចេញសរុប ពីខែមករាដល់ខែតុលាឆ្នាំនេះមានចំនួន ២៩៤.១៥៤តោន ពោលគឺច្រើនជាងឆ្នាំមុនដែលមាន១៤៦.២០០តោន ឬកើនឡើង១០១ភាគរយ។ ប្រទេសប៉ូឡូញបាននាំចូលអង្ករ៤៩.៧០៧តោន អំឡុងរយៈពេលនេះ ប្រទេសបារាំងនាំចូលច្រើនបំផុតលំដាប់ទី២ ហើយបណ្ដាប្រទេសជាសមាជិកសហភាពអឺរ៉ុបបានបង្កើនចំនួនប្រទេសបួនបន្ថែមទៀតក្នុងចំណោមបណ្ដាប្រទេសចំនួន១០ដែលនាំចូលអង្ករកម្ពុជាច្រើនបំផុត។

លោក គឹម សាវុធ ប្រធានសហព័ន្ធអ្នកនាំអង្ករចេញកម្ពុជាបានលើកឡើងថា សហភាពអឺរ៉ុបបាននាំចូលអង្ករភាគច្រើនពីប្រទេសកម្ពុជា ដោយសារតែមានកិច្ចព្រមព្រៀងពាណិជ្ជកម្មអ្វីគ្រប់យ៉ាងលើកលែងតែសព្វាវុធដែលអនុញ្ញាតឱ្យប្រទេសកម្ពុជានាំចេញទំនិញទៅបណ្ដាប្រទេសដែលជាសមាជិករបស់សហភាពនេះដោយមិនគិតពន្ធ។

លោកបានមានប្រសាសន៍ថា "បរិមាណនាំអង្ករចេញទៅប្រទេសទាំងពីរឱ្យបារាំង និងប៉ូឡូញបានកើនឡើងដោយសារតែមានក្រុមហ៊ុនច្រើនជាងមុនដែលដឹងពីកិច្ចព្រមព្រៀងរវាងសហភាពអឺរ៉ុប និងប្រទេសកម្ពុជាសម្រាប់នាំចូលអង្ករពីប្រទេសយើងដោយមិនគិតពន្ធ"។ រដ្ឋាភិបាលបានកំណត់ថា នៅឆ្នាំ២០១៥ប្រទេសកម្ពុជាត្រូវនាំអង្ករចេញឱ្យបាន១លានតោន ដើម្បីបង្កើនសមត្ថភាពប្រកួតប្រជែងរបស់ខ្លួននៅក្នុងតំបន់៕ **សុធា**

## តមកពីទំព័រទី ១២ សេចក្ដីព្រាងថវិកាឆ្នាំ២០១៤ឆ្លងផុត...

នៅពេលអ្នកសារព័ត៌មានសួរថា តើហេតុអ្វីបានជាព័ត៌មានលម្អិតទាក់ទងទៅនឹងថវិកានេះមិនត្រូវបានផ្សព្វផ្សាយជាសាធារណៈក្នុងដំណាក់កាលថ្មីនេះលោក ជាម យៀប បានបង្វែរសំណួរនេះទៅលោក ហេង ស៊ិន។ ក៏ប៉ុន្តែលោក ហេង ស៊ិន បានបដិសេធមិនឆ្លើយសំណួរនៅពេលលោកកំពុងចាកចេញពីកិច្ចប្រជុំកាលពីម្សិលមិញ ហើយ លោក កែវ ពិសិដ្ឋ ប្រធានខុទ្ទកាល័យរបស់លោកបានឱ្យដឹងថា លោកមិនដឹងថា តើមូលហេតុអ្វី? បានជាសេចក្ដីព្រាងថវិកានេះមិនកំពុងត្រូវបានផ្សព្វផ្សាយជាសាធារណៈ។

ទាំងលោក ជាម យៀប ទាំងលោក ពិសិដ្ឋ មិនបានលើកឡើងថា តើនៅពេលណាទើបសេចក្ដីព្រាងថវិកានេះឈានទៅដល់កិច្ចប្រជុំរដ្ឋសភាទេ។ ច្បាប់ស្ដីពីហិរញ្ញវត្ថុសាធារណៈចែងថា សេចក្ដីព្រាងថវិកានឹងទៅដល់ព្រឹទ្ធសភាយ៉ាងយូរក្នុងសប្ដាហ៍ដំបូងនៃខែធ្នូ បន្ទាប់ពីសេចក្ដីព្រាងថវិកានេះឆ្លងផុតរដ្ឋសភា។

តំណាងរាស្ដ្រជាប់ឆ្នោតទាំង៥៥រូបរបស់គណបក្សប្រឆាំង ពោលគឺមានចំនួនជិតពាក់កណ្ដាលនៃចំនួនតំណាងរាស្ដ្រសរុបក្នុងរដ្ឋសភាកំពុងបដិសេធមិនទទួលយកអាសនៈរបស់ខ្លួនទេលុះត្រាតែគណបក្សប្រជាជនកម្ពុជាឯកភាពលើកម្មវិធីកែទម្រង់ប្រព័ន្ធបោះឆ្នោត និងប្រតិបត្តិការស៊ើបអង្កេតឯករាជ្យមួយចំពោះការបោះឆ្នោតកាលពីខែកក្កដា។ គណបក្សសង្គ្រោះជាតិបានឱ្យដឹងថា រដ្ឋសភាគឺជារដ្ឋសភាមិនស្របច្បាប់ដោយសារតែមិនមានការចូលរួមរបស់ខ្លួន ហើយមិនអាចអនុម័តច្បាប់នានាដោយស្របច្បាប់បានទេ រួមទាំងសេចក្ដីព្រាងថវិកានេះ លុះត្រាតែខ្លួនចូលរួម។

គណបក្សប្រជាជនកម្ពុជាបានលើកឡើងថា ខ្លួនមានសំឡេងភាគច្រើនដាច់ខាតនៅក្នុងរដ្ឋសភាដែលផ្ដល់ភាពស្របច្បាប់ដល់ខ្លួនក្នុងការអនុម័តសេចក្ដីព្រាងថវិកានេះ និងជំរុញ ដំណើរការអនុម័តនេះទោះជាមានឬក៏គ្មានគណបក្សប្រឆាំងក៏ដោយ ៕

**សុធា**

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម **Advertising**
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ **Editorials**
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

**អ្នកនិពន្ធកិត្តិយស Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D. James Ostis
**ច្នៃសោភ័ណភាពកាសែត Design Artist**
Heng Chhunleng
**ជំនួយការរដ្ឋបាល Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009



# សម្រស់ក្មេងជាងវ័យដោយសារការទទួលទានអាហារ



**១_ខ្ទឹមស:** វាមានគុណសម្បត្តិពិសេស អាចជួយកម្ចាត់អាការមួយចំនួនបានដូចជាប្រើជាថ្នាំបណ្តេញខ្យល់ចេញពីក្នុងពោះវៀនបំបាត់រោគក្អកកាត់ស្លេស្ម និងជួយរំលាយអាហារ។ ក្រៅពីនេះខ្ទឹមសមានសារជាតិអែលលីស៊ីន (Allicin) ដែលជួយកកាត់បន្ថយជាតិខ្លាញ់ក្នុងឈាម ឬអាចហៅថា កូលេស្តេរ៉ុល។ ការទទួលទានខ្ទឹមសក្នុងមួយថ្ងៃ១ទៅ៣ កំពឹសអាចជួយការពាររោគបេះដូងការពារការកកស្ទះនៃឈាមក្នុងរាងកាយដែលជាហេតុធ្វើឱ្យមានជំងឺកកស្ទះឈាម ឬបេះដូងខ្វះឈាមបាន។

**២_បន្លែ និងផ្លែឈើ:** ការទទួលទានបន្លែផ្លែឈើជាប់ជាប្រចាំរួមទាំងរុក្ខជាតិសណ្តែកផ្សេងៗដែលសម្បូរទៅដោយវីតាមីនធាតុរ៉ែ និងអង់ស៊ីមជាច្រើនមុខនោះអាចជួយពង្រឹងកោសិកាក្នុងរាងកាយឱ្យរឹងមាំសាច់ដុំហាប់ណែន និងស្បែកតឹងណែនល្អ។ ក្រៅពីនេះបន្លែទាំងនេះ នៅអាចជួយឱ្យមានថាមពលខ្លាំងក្លា និងប្រព័ន្ធកាកសំណល់បញ្ចេញចោលដូចជា លាមក ទឹកនោមបានល្អទៀតផង។

ជួយកិនរំលាយអាហារបានយ៉ាងល្អ។ ក្រុមឯកទេសបានរកឃើញថា ប្រូតេអ៊ីននៅក្នុងសណ្តែកសៀងជួយកាត់បន្ថយជាតិខ្លាញ់អាក្រក់ក្នុងឈាម និងជួយបន្ថែមបរិមាណខ្លាញ់ល្អៗបញ្ចូលទៅវិញ។ វាអាចជួយការពាររោគសសៃឈាមបេះដូង និងការពាររោគបេះដូងមួយចំនួន។ ក្នុងសណ្តែកសៀងសម្បូរទៅដោយសារជាតិ កាល់ស្យូម ដែក ស័ង្កសី និងវីតាមីន B។

**៤_ត្រីសមុទ្រ:** មានដូចជា ត្រីសាល់ម៉ុន ត្រីធូណា ត្រីសាឌីន ជាដើម មានអាស៊ីតខ្លាញ់អូមេហ្គា៣ ដែលក្រុមអ្នកស្រាវជ្រាវបានរកឃើញថា ត្រីទាំងនោះអាចជួយការពាររោគបេះដូងឈាមត្បៀតតូច.ជួយការពារដល់ការធ្វើការងាររបស់ប្រព័ន្ធខួរក្បាល និងកាត់បន្ថយជំងឺលើសឈាម។ ក្នុងត្រីសមុទ្រមានជាតិខ្លាញ់ម្យ៉ាងឈ្មោះ (ត្រាយគ្លីស៊ីរ៉ៃ) អាចជួយថែរក្សាចលនាចង្វាក់បេះដូងឱ្យមានដំណើរការលោតបានល្អ ហើយក្រៅពីនេះនៅមានសារជាតិអាចជួយការពារមិនឱ្យកោសិកាធ្វើការងារខុសប្រក្រតីទៀតផង។

**៥_តែ:** ជួយកាត់បន្ថយភាពចាស់ និង

ក្រៅពីការពាររោគសសៃឈាមបេះដូង ហើយនៅអាចកាត់បន្ថយជាតិខ្លាញ់ក្នុងសរសៃឈាម និងជួយការពាររោគមហារីកបានទៀតផង។ តែ

ថែរក្សាអនាម័យក្នុងមាត់ និងកម្ចាត់បាក់តេរីមួយចំនួនចេញពីក្នុងមាត់ ហើយអាចធ្វើឱ្យធ្មេញកាន់តែរឹងមាំ៕

# សមាគមខ្មែរប្រារព្ធខួប



លោក ប៊ុនរិទ្ធ ឡាច ទទួលការកោតសរសើរពីសមាគមខ្មែរក្នុងការបំរើសហគមន៍




ក្រុម CMAA Young Profe

ដោយ : សុខា

**ឡូវែល:** ថ្ងៃទី២ វិច្ឆិកា ឆ្នាំ២០១៣ សមាគមខ្មែរបានប្រារព្ធខួបលើកទី២៩ នៃការកកើតសមាគម ។ បច្ចុប្បន្នលោក វ៉ាស៊ី អាន ជានាយកប្រតិបត្តិនៅសមាគមខ្មែរ ព្រមទាំងនាយកប្រតិបត្តិរងគឺ វូប ដី វុលភៀលៀរ ។ កម្មវិធីខួបលើកទី២៩ មានការចូលរួមច្រើនកុះករពីស្ថាប័នរដ្ឋឯកជនក្រុមហ៊ុនមជ្ឈមណ្ឌលនានាដែលមានក្នុងសហគមន៍ និងតំបន់ ។ ក្នុងនោះមានវត្តមានអភិបាលក្រុង ផាទ្រីក មឺហ្វី ទីប្រឹក្សាសាលាក្រុងខ្មែរ វ៉ាសនា នួន បេក្ខជនទីប្រឹក្សាក្រុងខ្មែរវ័យក្មេង វេន ពេជ្រ ទីប្រឹក្សាសាលាក្រុងរីតា មឺស្ស៊ី គណៈកម្មាការ សាលា ដេវ ខុនវេយ៍ មន្ត្រី នៅសាលាឧទ្ទរណ៍ឡូវែលលោក រីឆាដ ហូវ ភ្ញៀវកិត្តិយសជាតិ និងអន្តរជ ធំ ។

កម្មវិធីរាត្រីនោះចាប់ផ្តើមនៅម៉ោង៦និង៣០ល្ងាចផ្តល់ឱកាសដល់ភ្ញៀ រួមទាំងអស់អាចមានឱកាសមានមតិសំណេះសំណាលចងទំនាក់ទំនងគ្នាទាំង ការងារ ឬជាការចែករំលែកបទពិសោធ ហើយក៏អាចជាការជួបគ្នាសួរស និយាយលេងក្រៅពីការបំពេញភារកិច្ចដ៏រវល់ផ្សេងៗ ។ កម្មវិធីប្រព្រឹត្តទៅរហូ



លោក វ៉ាស៊ី អាន នាយកប្រតិបត្តិសមាគមខ្មែរ



អ្នកនាង បុប្ផា មេលុន ពិធីការិនីក្នុងខួបលើកទី២៩នៃសមាគមខ្មែរ



វូប ដីវុលភៀលៀរ នាយកប្រតិបត្តិរងនៃសមាគមខ្មែរ




Umass Amherst ទទួលការកោ

# ើកទី២៩យ៉ាងអធិកអធម






ប្រធានគណកម្មការនាយកសមាគមខ្មែរលោក ខេវិន ខុហ្វលីន
ទទួលប័ណ្ណសរសើរពីសមាគមខ្មែរក្នុងការបំរើសហគមន៍



ភ្ញៀវកិត្តិយសជាតិ និងអន្តរជាតិចូល រួមអបអរសាទរខួបលើកទី២៩នៃសមាគមខ្មែរ



លោក វ៉ាស៊ី អាន,វូប ដឺ វុលភៀវល្បៀវរ, ប្រាយ អិនជិន,រ៉ននី មុត,លោក ពុធ ធារី, បុប្ផា មេលុន
(នាយកប្រតិបត្តិ នាយកប្រតិបត្តិរង និងបុគ្គលិកនៃសមាគមខ្មែរ)



ការរាំកំសាន្តខួបលើកទី២៩នៃសមាគមខ្មែរ

am

២អធ្រាត្រត្បិតមានរបៀបវារៈកម្មវិធី និងការសម្តែងកំសាន្តជាច្រើនមាន
ការរាំរបាំជូនពរ និងរបាំត្រឡោកដោយក្រុមរបាំអង្គរការបើកកម្មវិធីផ្តល់
ថា ដោយប្រធានគណៈកម្មការនាយកគឺលោក ខេវិន ខុហ្វលីន មតិនាយក
តិសមាគមខ្មែរលោកវ៉ាស៊ីអាន និងនាយកប្រតិបត្តិរង វូប ដឺវុលភៀវល្បៀវរ
ត្តិយសដែលអញ្ជើញមកពីស៊ីនៀវហ្វូលហៀលសុបិន្តខ្មែរជាដើម។ លើសពី
រប្រគល់ជូននូវលិខិតកោតសរសើរចំពោះពលរដ្ឋមានស្នាដៃនៅក្នុងសហគមន៍
ជាលោក ប៊ុនរិទ្ធ ឡាច ដែលជាអ្នកតស៊ូសកម្មក្នុងការបន្តសកម្មភាព
ប្រកបជំនួញប្រាស្រ័យទាក់ទងជាមួយសហគ្រិនខ្មែរៗដែលនៅឡូវែល និងក្នុងតំបន់
ហើយដែលបានលះបង់ច្រើនបម្រើសហគមន៍។ គួរបញ្ជាក់ផងដែរ កម្មវិធីខួបលើក
ទី២៩របស់សមាគមខ្មែរប្រព្រឹត្តទៅដោយមានអ្នកនាងបុប្ផាមេលុនជាពិធីការិនី
សម្របសម្រួលកម្មវិធី ហើយក៏ជាសមាជិកម្នាក់ក្នុងចំណោមគណៈកម្មការរៀបចំ
កម្មវិធី៩រូបទៀត រួមមាន វិច្ឆិកា គង់ វ៉ាស៊ី អាន ប្រាយអិន ជិន អេមស៊ី ម៉ូរែល រ៉ននី
មុត សុបិន្ត ពិន វីរៈ អ៊ុយ វូប ដឺ វុល ភៀវល្បៀវរ និងធីម៉ូថ្មី វែលឆ។ ឆ្នាំ២០១៣ក្នុង
ខួបលើកទី២៩សមាគមខ្មែរបានប្រារព្ធកម្មវិធីនេះ ទទួលជោគជ័យគួរជាទីមោទនៈ៕



ាគមខ្មែរ



របាំគោះត្រឡោកដោយក្រុមរបាំអង្គរ




របាំជូនពរដោយក្រុមរបាំអង្គរ

# First Round of New Talks Between Cambodia's Feuding Parties Not 'Fruitful'

**RFA 2013-11-05**
**Posted by Jendhamuni at 06/11/13**

The first senior-level meeting between the opposition Cambodia National Rescue Party (CNRP) and Prime Minister Hun Sen's party aimed at breaking a deadlockover electionresults ended on a pessimistic note Tuesday though they have decided to continue negotiations, officials said.

The CNRP said in a statement that the meeting was not "fruitful," lamenting that its key proposal for an investigation into fraud and other irregularities in the July 28 elections continues to be set aside by the ruling Cambodian People's Party (CPP).

"The CNRP would like to inform the public that the meeting of working teams between the CPP and CNRP ... didn't produce any fruitful results," the statement said, adding that the lack of successful negotiations was due to "the CPP [refusal] to investigate the election irregularities."

"To be responsible before the nation, the CNRP thinks an investigation into election irregularities is vital, and it must be carried out before any political solution agreement takes place."


RFA photo

The two parties failed to discuss the "vital" issue, the CNRP said after their first meeting since talks in September collapsed.

The CNRP added that while Tuesday's three-hour closed door meeting had "not produced any positive results," it would like to continue to hold talks with the ruling party. The next meeting could be held late this week.

*Continued from Page 01*

## 2013 City Election Results

and Corey Belanger. They will replace Mayor Patrick Murphy who did not seek re-election and current councilors Marty Lorrey, Joe Mendonca and Vesna Nuon who all lost in their attempt to win re-election.

For the Lowell School Committee, all six incumbent school committee members sought re-election along with one challenger. That challenger, Steven Gendron, was elected and current school committee member Robert Gignac was defeated. On the Greater Lowell Regional School Committee, current committee members Fred Bahou and George O'Hare were re-elected. Challenger Bopha Peou was unsuccessful.

Here are the results showing the candidates in the order of finish along with the total number of votes received.

### City Council

Candidates who were elected:

1. Rita Mercier - 6346
2. Rodney Elliott - 5301
3. Edward Kennedy - 5077
4. Daniel Rourke - 4644 - new
5. James Milinazzo - 4608 - new
6. William Samaras - 4462 - new
7. Corey Belanger - 4384 - new
8. William Martin - 4331
9. John Leahy - 4299

**Council candidates not elected**

10. Marty Lorrey - 4121 - current councilor
11. Joe Mendonca - 3985 - current councilor
12. Derek Mitchell - 3949
13. Erik Gitschier - 3913
14. Stacie Hargis - 3528
15. Vesna Nuon - 3243 - current councilor
16. Van Pech - 2271
17. Fred Doyle - 1584
18. Genevieve Doyle - 1456

Lowell School Committee

1. Jim Leary - 6403
2. Steve Gendron - 6353 - new
3. Dave Conway - 6349
4. Connie Martin - 5505
5. Kim Scott - 5370
6. Kristen Ross-Sitcawich - 5251
7. Robert Gignac - 4869 - current committee member

### Greater Lowell Vocational

George O'Hare - 6231
Fred Bahou - 6007
Bopha Peou - 3547

*Contined From Page 12 :*

## UN Says 2012 Set Record for...

"The illicit harvesting and export of safrole-rich oils…which can be used as a precursor for MDMA, remains an environmental and law enforcement concern."

Looking beyond the production of illegal substances, the UNODC says statistics on the number of drug users in Cambodia are inconsistent.

The report notes that the number given by the National Authority for Combating Drugs (NACD) in 2012 was 4,057, but was amended in March 2013 to an estimate in excess of 10,000 users.

The NACD's secretary-general, Lieutenant General Meas Vyrith, said by telephone yesterday that the number is "between 5,000 to 6,000 drug users in the whole of the country."

In March, NGO Mith Samlanh estimated that at least 40 percent of the estimated 20,000 street children in Phnom Penh were using drugs.

The UNODC report found that there had been an uptick in the number of users who inject drugs. In line with that view, the number of HIV cases among the injecting population of drug users had also risen from 24.1 percent among 1,900 injecting drug users in 2011 to 24.8 per-cent in 2012, according to the National AIDS Authority of Cambodia.

To combat drug use around the country, there are 13 "temporary centers for drug education and rehabilitation"—six of which are run by the government with the remaining seven operating privately.

"However, international and government agencies are concerned that drug treatment centers in Cambodia do not have sufficient treatment focus," the report says.

According to Lt. Gen. Vyrith, a joint-government/UNODC community based treatment program in Banteay Meanchey, Stung Treng and Battambang provinces "has been successful and will expand" further.

Clay Nayton, a community-based treatment officer with the UNODC in Cambodia, said the establishment of the program has proven a viable alternative to the country's drug centers, providing support for 1,200 drug users.

"The program has been running for close to three years and offers a human rights based ap-proach and viable alternative to compulsory state-run rehabilitation centers," Mr. Nayton said.

While drug-related arrests decreased 25 percent from 2,381 people in 2011 to 1,788 people in 2012, the number of arrests is still significantly greater than the average of 517 arrests recorded between 2006 and 2010, the report says.

Lt. Gen. Vyrith said he does not have figures related to seizures this year, but said the numbers could likely be higher than 2012.

"Comparing the first nine months of this year to last year, we have had more crackdowns on drugs be-cause our officials are paying more attention to carrying out the law and law enforcement," he said.

តមកពីទំព័រទី ១

## តើការទាមទារតំណែងរបស់គណបក្ស...

តើគណបក្សនយោបាយដែលចាញ់ឆ្នោតហើយបានតំណែងជាប្រធានរដ្ឋសភាជារឿងថ្មីសម្រាប់កម្ពុជាពិតមែនឬ?

នៅក្នុងកិច្ចប្រជុំដំបូងនៃគណៈរដ្ឋមន្ត្រីអាណត្តិទី៥ កាលពីថ្ងៃទី២៥ ខែកញ្ញា ក្រោយការបោះឆ្នោតសភាជាតិឆ្នាំ២០១៣ លោក ហ៊ុន សែន បានប្រកាសប្រាប់សមាជិករដ្ឋាភិបាលថ្មីរបស់លោកថា មេដឹកនាំគណបក្សសង្គ្រោះជាតិទាមទារយកតំណែងប្រធានរដ្ឋសភា។ លោកថ្លែងថា គ្មានទេក្នុងលោកនេះគណបក្សដែលមានសំឡេងភាគតិចក្នុងរដ្ឋសភាត្រូវឡើងមកកាន់ក្បាលម៉ាស៊ីនដឹកនាំអង្គនីតិបញ្ញត្តិនោះ។

លោក ហ៊ុន សែន បានថ្លែងដូច្នេះ: "ខ្ញុំថាឯកឧត្តម! នេះជាលើកដំបូងក្នុងប្រវត្តិសាស្ត្រដែលខ្ញុំបានស្តាប់ឮ និងបានឃើញបក្សដែលមានសំឡេងភាគតិចធ្វើប្រធានរដ្ឋសភា។ សូមឯកឧត្តមដើរពិនិត្យមើលប្រទេសលើសកលលោកមានប្រទេសប៉ុន្មានរួចមកប្រាប់ខ្ញុំផង។ វាមិនដែលមាន! ខ្ញុំនិយាយអំពីរបបប្រជាធិបតេយ្យសភា ដូចជានៅស្រុកយើង ដូចជានៅសិង្ហបុរី ដូចជានៅម៉ាឡេស៊ី ដូចជានៅថៃអី គឺបក្សណាឈ្នះបក្សហ្នឹងធ្វើប្រធានសភាហើយរាប់ទាំងប្រទេសបារាំងដែលជាប្រទេសពាក់កណ្តាលប្រធានាធិបតីពាក់កណ្តាលសភាអីចឹងបក្សណាឈ្នះឆ្នោតបក្សហ្នឹងគេធ្វើប្រធានសភាហើយ"។

ប្រហែលជាលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន រវល់តែសម្លឹងទៅរកឆ្ងាយភ្លេចមើលក្រោមក្លៀកខ្លួនហើយមើលទៅបានជាលោករកមិនឃើញ។ តាមពិតមិនបាច់ទៅរកទីណាឆ្ងាយទេ។ រដ្ឋសភាខ្មែរក្នុងរជ្ជកាលព្រះរាជាណាចក្រកម្ពុជាលើកទី២នេះមានប្រធានរដ្ឋសភាមកពីគណបក្សចាញ់ឆ្នោតបីដងហើយរហូតមកដល់ពេលនេះ។



ទី១ គឺពីឆ្នាំ១៩៩៣ ដល់ឆ្នាំ១៩៩៨ មានលោក ជា ស៊ីម ពីគណបក្សប្រជាជនកម្ពុជាដែលជាគណបក្សចាញ់ឆ្នោតជាប្រធានរដ្ឋសភា។ ការបោះឆ្នោតសភាជាតិនៃនីតិកាលទី១ នាឆ្នាំ១៩៩៣នោះ គណបក្សរាជានិយមហ្វ៊ុនស៊ិនប៉ិចបានឈ្នះឆ្នោតលើសលប់។ គណបក្សប្រជាជនកម្ពុជាដែលចាញ់ឆ្នោតមិនសុខចិត្តដោយចោទថា អង្គការសហប្រជាជាតិដែលរៀបចំការបោះឆ្នោតនៅពេលនោះ មានភាពលំអៀង ហើយបានប្រកាសគំរាមប្រើកម្លាំងដើម្បីបំបែករដ្ឋដោយបង្កើតតំបន់អបគមន៍នៅត្រើយខាងកើតទន្លេមេគង្គ។

ដោយបារម្ភអំពីការផ្ទុះសង្គ្រាមឡើងវិញ ព្រះមហាវីរក្សត្រសម្តេចព្រះ នរោត្តម សីហនុ បានចេញព្រះភ័ក្ត្រសម្របសម្រួលអោយមានការបែងចែកអំណាចគ្នារវាងគណបក្សទាំងពីរ។ ព្រះអង្គបានស្នើអោយសម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ ប្រធានគណបក្សហ្វ៊ុនស៊ិនប៉ិចដែលឈ្នះឆ្នោតធ្វើជានាយករដ្ឋមន្ត្រីទី១ ហើយលោក ហ៊ុន សែន ពីគណបក្សប្រជាជនកម្ពុជាដែលចាញ់ឆ្នោតធ្វើជានាយករដ្ឋមន្ត្រីទី២។

ចំណែកលោក ជា ស៊ីម ដែលជាប្រធានគណបក្សប្រជាជនកម្ពុជា ក៏ត្រូវសម្តេចព្រះនរោត្តម សីហនុ រកតំណែងអោយបានសមរម្យដែរ គឺប្រធានរដ្ឋសភា។ ការរៀបចំផ្គុំផ្គងផ្សំផ្គុំផ្ទុយពីឆន្ទៈរបស់ប្រជារាស្ត្រដែលជាម្ចាស់ឆ្នោតនេះ ត្រូវលោក ហ៊ុន សែន ដែលមិនទាន់ក្លាយជាបុរសខ្លាំងនៅពេលនោះប្រកាសទទួលយកភ្លាមៗ។ ចំណែកសម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ ពីគណបក្សឈ្នះឆ្នោតនៅពេលនោះទទួលយកទាំងបង្ខំចិត្ត។

ប្រធានរដ្ឋសភាមកពីគណបក្សចាញ់ឆ្នោតលើកទី២ គឺនៅឆ្នាំ១៩៩៨ ការបោះឆ្នោតនីតិកាលទី២ នៅពេលនោះ គណបក្សហ្វ៊ុនស៊ិនប៉ិចចាញ់ឆ្នោតម្តង ។ ប៉ុន្តែគណបក្សប្រជាជនកម្ពុជាដែលមិនចង់ឃើញគណបក្សហ្វ៊ុនស៊ិនប៉ិច និងគណបក្ស សម រង្ស៊ី ធ្វើជាបក្សប្រឆាំងរួមគ្នាក៏បានបង្កើតរដ្ឋាភិបាលចម្រុះជាមួយគណបក្សហ្វ៊ុនស៊ិនប៉ិចដោយសម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ ធ្វើជាប្រធានរដ្ឋសភា ហើយទុកអោយគណបក្ស សម រង្ស៊ី ជាបក្សប្រឆាំងឯកោតែឯង។

ប្រធានរដ្ឋសភាមកពីគណបក្សចាញ់ឆ្នោតលើកទី៣ គឺនៅឆ្នាំ២០០៣ ដល់ឆ្នាំ២០០៨។ លទ្ធផលសន្លឹកឆ្នោតនីតិកាលទី៣ ប្រកាសដោយគណៈកម្មាធិការបោះឆ្នោតហៅកាត់ថា គ.ជ.ប គណបក្សប្រជាជនកម្ពុជាឈ្នះឆ្នោតទៀត។ គណបក្សប្រជាជនកម្ពុជាបានប្រើយុទ្ធសាស្ត្រដដែល គឺផ្តល់តំណែងរដ្ឋសភាដល់សម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ ដើម្បីទុកអោយគណបក្ស សម រង្ស៊ី ជាបក្សប្រឆាំងនៅតែឯង។ គណបក្សប្រជាជនកម្ពុជាតែងព្រួយបារម្ភ **តទៅទំព័រទី ២១**

## តមកពីទំព័រទី ២០ តើការទាមទារតំណែងរបស់គណបក្ស...

អំពីការរួមគ្នា ឬការច្របាច់បញ្ចូលនៃគណបក្សប្រឆាំង។

ដូច្នេះវាមិនមែនជារឿងថ្មីនោះទេ ដែលគណបក្សមានសំឡេងភាគតិចកាន់តំណែងជាប្រធានរដ្ឋសភានោះ ដោយគ្រាន់តែថា ប្រធានរដ្ឋសភាពីបក្សមានសំឡេងភាគតិចទាំង៣អាណត្តិពេលនោះ មិនបានដើរតួជាបក្សជំទាស់តែជារដ្ឋសភាដែលស៊ីខ្សែស្របជាមួយគោលនយោបាយរបស់រដ្ឋាភិបាល។

ឥឡូវយើងងាកមកមើលបញ្ហាចម្រូងចម្រាសនៅពេលបច្ចុប្បន្នក្រោយការបោះឆ្នោតសភាជាតិកាលពីខែកក្កដា ឆ្នាំ២០១៣ នេះវិញម្តង ដោយចាប់ផ្តើមជាសំណួរថា ហេតុអ្វីបានជាគណបក្សសង្គ្រោះជាតិដែលជាគណបក្សចាញ់ឆ្នោតហ៊ានទាមទារតំណែងប្រធានរដ្ឋសភា?

បញ្ហាត្រង់ថា គណបក្សសង្គ្រោះជាតិមិនបានទទួលថា ខ្លួនជាបក្សចាញ់ឆ្នោតនោះទេ។ តាមយន្តការផ្លូវច្បាប់គណបក្សនេះបានប្រើអស់ហើយដើម្បីបញ្ជាក់ថា ខ្លួនជាបក្សឈ្នះឆ្នោត។ ប៉ុន្តែមិនទទួលបានដំណោះស្រាយដែលអាចទទួលយកបាន។ ប្រហែលជាក្រោយពីដឹងខ្លួនថា មិនអាចយកឈ្នះតាមការប្តឹងផ្តល់ដោយសារស្ថាប័នរដ្ឋសម្រាប់រកយុត្តិធម៌ទាំងអស់ស្ថិតក្រោមឥទ្ធិពលរបស់គណបក្សប្រជាជនកម្ពុជាថ្នាក់ដឹកនាំគណបក្សសង្គ្រោះជាតិងាកមកចរចាជាមួយគណបក្សប្រជាជនកម្ពុជាដោយទាមទារយកតំណែងប្រធានរដ្ឋសភា ប៉ុន្តែគណបក្សប្រជាជនកម្ពុជាមិនបានយល់ព្រម។ សម្រាប់គណបក្សសង្គ្រោះជាតិគ្មានជម្រើសទៀតទេ ក្រៅតែពីដឹកនាំបាតុកម្មមហាជនដែលគណបក្សប្រជាជនកម្ពុជាខ្លាចបំផុតនោះ។

តើការទាមទារយកតំណែងប្រធានរដ្ឋសភារបស់គណបក្សសង្គ្រោះជាតិនោះវាសមរម្យដែរទេ?

ការទាមទាររបស់គណបក្សសង្គ្រោះជាតិមិនមែនគ្មានដើមទុន ឬមិនមែនអត់មូលដ្ឋានស្របច្បាប់នោះទេ។ ភាពស្របច្បាប់ដ៏រឹងមាំរបស់គណបក្សសង្គ្រោះជាតិដែលជាទុនសំខាន់ក្នុងការតវ៉ាទាមទារនោះ គឺភាពមិនប្រក្រតីនៃការបោះឆ្នោតដែលគេឯងមើលឃើញគ្រប់គ្នា។ ភាពមិនប្រក្រតីដែលប៉ះពាល់ដល់ការបោះឆ្នោតដោយសេរីយុត្តិធម៌ និងអាចទទួលយកបានទាំងនោះរួមមាន:

ទី១ អំឡុងពេលឃោសនាបោះឆ្នោតគណបក្សប្រជាជនកម្ពុជាដែលជាបក្សកាន់អំណាចបានប្រើប្រាស់ធនធានរដ្ឋ និងកម្លាំងមន្ត្រីរាជការរួមទាំងប៉ូលិស ទាហាន ឃោសនាដើម្បីប្រយោជន៍បក្សរបស់ខ្លួនដែលជាការបំពានច្បាប់បោះឆ្នោត។ ទី២ មុនពេលបោះឆ្នោតអង្គការសង្កេតការណ៍បោះឆ្នោតមានខុមហ្វ្រែល (COMFREL) និចហ្វិក (Nicfec) និងវិទ្យាស្ថានជាតិដើម្បីលទ្ធិប្រជាធិបតេយ្យ (NDI) បានរកឃើញថា មានអ្នកមានសិទ្ធិបោះឆ្នោតចំនួនជាង១លាននាក់ បានបាត់ឈ្មោះពីបញ្ជីបោះឆ្នោត ហើយព្រមានថា បើមិនដោះស្រាយទេ នឹងជួបវិបត្តិនៅពេលបោះឆ្នោត។

ទី៣ បញ្ហាពិតជាកើតមានមែននៅថ្ងៃបោះឆ្នោត។ ភាពមិនប្រក្រតីនៅថ្ងៃបោះឆ្នោតរួមមានមនុស្សជាច្រើនរកឈ្មោះបោះឆ្នោតខ្លួនមិនឃើញមិនអាចបោះឆ្នោតបានតែបែរជាមានជនជាតិវៀតណាមមានសិទ្ធិបោះឆ្នោត។ អ្នកខ្លះបោះឆ្នោតច្រើនជាងមួយដង និងបញ្ហាទឹកថ្នាំជ្រលក់ម្រាមដៃលុបជ្រះជាដើម។ ទី៤ការចោទប្រកាន់អំពីភាពមិនប្រក្រតីទាំងឡាយរបស់បក្សប្រឆាំង និងសង្គមស៊ីវិលត្រូវបានបញ្ជាក់ថា ពិតជាកើតមានមែនបន្ទាប់ពីក្រុមប្រឹក្សាធម្មនុញ្ញបញ្ជាអោយ គ.ជ.ប បើកកញ្ចប់សុវត្ថិភាព "ក"។ កញ្ចប់សុវត្ថិភាព "ក" ជាកញ្ចប់ដែលដាក់ឯកសារដើមជាច្រើនមកពីការិយាល័យបោះឆ្នោត។ កញ្ចប់សុវត្ថិភាព "ក" ខ្លះ ក្នុងខេត្តចំនួនបួន មានខេត្តក្រចេះ សៀមរាប បាត់ដំបង និងខេត្តកណ្តាល ត្រូវបានបើកពិនិត្យមើល ហើយប្រទះឃើញមានភាពមិនប្រក្រតីពិតជាកើតមានរួមមានកញ្ចប់សុវត្ថិភាព "ក" ត្រូវបើកចំហដែលខុសពីនីតិវិធីច្បាប់ ហើយខេត្តដែលភាពមិនប្រក្រតីធ្ងន់ជាងគេ គឺខេត្តក្រចេះ និងខេត្តសៀមរាប។

បន្ទាប់ពីរកឃើញភាពមិនប្រក្រតីនៅខេត្តទាំង៤នេះហើយ ក្រុមប្រឹក្សាធម្មនុញ្ញបែរជាប្រកាសបញ្ឈប់ការបើកកញ្ចប់សុវត្ថិភាព "ក" នេះតទៅទៀត ហើយប្រកាសគាំទ្រ ឬតម្កល់សេចក្តីសម្រេចរបស់ គ.ជ.ប ថា បានការ។ ក្រុមប្រឹក្សាធម្មនុញ្ញសម្រេចដូច្នេះ ដោយលើកហេតុផលថា ភាពមិនប្រក្រតីទាំងនេះមិនប៉ះពាល់ដល់សន្លឹកឆ្នោត ឬអាសនៈរបស់គណបក្សធំៗទាំង២ទេ។ លើសពីនេះក្រុមប្រឹក្សាធម្មនុញ្ញបានបង្គាប់អោយគ.ជ.ប បើកសវនាការដាក់ទណ្ឌកម្មមន្ត្រីរៀបចំការបោះឆ្នោតថ្នាក់ក្រោមនៅខេត្តក្រចេះ ដោយចោទថា ជាអ្នកបង្កអោយមានភាពមិនប្រក្រតី ប៉ុន្តែមិនបានបញ្ជាឱ្យគេរាប់សន្លឹកឆ្នោតឡើងវិញ និងមិនបានផ្តល់ឱកាសអោយមន្ត្រីថ្នាក់ក្រោមទាំងនោះបំភ្លឺបកស្រាយទេ។

ក្រុមអ្នកឃ្លាំមើលការបោះឆ្នោតដាក់ការសង្ស័យលើអព្យាក្រឹតរបស់ក្រុមប្រឹក្សាធម្មនុញ្ញ និងថាទង្វើនិងសេចក្តីសម្រេចរបស់ស្ថាប័នកំពូលមួយនេះគ្រាន់តែធ្វើឡើងអោយល្អមើលក្រោយពីមានសម្ពាធពីមជ្ឈដ្ឋាននានា។

ទី៥ ការប្រកាសទម្លាក់កំហុសរបស់ក្រុមប្រឹក្សាធម្មនុញ្ញទៅលើមន្ត្រីរៀបចំការបោះឆ្នោតថ្នាក់ឃុំនៅខេត្តក្រចេះ ត្រូវមន្ត្រីថ្នាក់ឃុំទាំងនោះឆ្លើយបកមកវិញថា ជារឿងអយុត្តិធម៌ដែលមិនអាចទទួលយកបានទេ។ មន្ត្រីរៀបចំការបោះឆ្នោតថ្នាក់ឃុំទាំងនោះបានអោយដឹងថា ប្រការដែលពួកគេទុកកញ្ចប់សុវត្ថិភាព "ក" ចំហនោះ គឺធ្វើតាមបញ្ជារបស់មន្ត្រីរៀបចំការបោះឆ្នោតថ្នាក់លើ។

ដោយសំអាងថា ភាពមិនប្រក្រតី ឬការលួចបន្លំសន្លឹកឆ្នោតប្រាកដជាកើតមាន ហើយ គ.ជ.ប និងក្រុមប្រឹក្សាធម្មនុញ្ញមិនអាចរកយុត្តិធម៌ជូនម្ចាស់ឆ្នោត តទៅទំព័រទី ២២

តមកពីទំព័រទី ២១
## តើការទាមទារតំណែងរបស់គណបក្ស...

បានគណបក្សសង្គ្រោះជាតិសុខចិត្តបន្ទន់ឥរិយាបថ ដោយចរចាទាមទារយកតំណែងដឹកនាំរដ្ឋសភាក្នុងបំណងអោយមានតុល្យភាពអំណាចជាមួយខាងរដ្ឋាភិបាលដឹកនាំដោយបក្សប្រជាជនកម្ពុជា។

គណបក្សសង្គ្រោះជាតិ និងពលរដ្ឋដែលគាំទ្របក្សនេះ ផ្តល់ហេតុផលថា ប្រសិនបើទុកអោយគណបក្សប្រជាជនកម្ពុជាក្តោបក្តាប់ទាំងរដ្ឋសភាផង និងរដ្ឋាភិបាលផង។ រដ្ឋសភានេះនឹងនៅតែជារដ្ឋសភាគ្មានអំណាចជារដ្ឋសភាត្រឹមតែចាំប្រថាប់ត្រាអោយរដ្ឋាភិបាលដដែល។ ហើយក្រោមការដឹកនាំរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ៥ឆ្នាំទៅមុខទៀត មានន័យថា តុលាការនឹងនៅតែស្ថិតក្រោមសម្ពាធរបស់បក្សប្រជាជនកម្ពុជាអំពើពុករលួយទំនងជានឹងមិនថមថយ ពីព្រោះគណបក្សប្រជាជនកម្ពុជាប្រាកដជានឹងមិនកែប្រែច្បាប់ប្រឆាំងអំពើពុករលួយដែលលំអៀង និងមានទិន្នាការការពារប្រយោជន៍អ្នកកាន់អំណាចនៅពេលបច្ចុប្បន្ន។

នៅពេលអំពើពុករលួយមិនស្រុតចុះគ្រូបង្រៀន មន្ត្រីរាជការ និងកងប្រដាប់អាវុធនឹងនៅតែទទួលប្រាក់ខែក្នុងកម្រិតអន់ថយដែលមិនអាចរស់បានសមរម្យ។ នៅពេលប្រាក់ខែតិចគ្រូបង្រៀននឹងបង្ខំចិត្តអោយសិស្សបង់លុយ និងបន្តយកនំចំណីមកលក់ក្នុងសាលាអោយសិស្សខ្លួនទិញ។ រីឯសិស្សក្រីក្រគ្មានលុយបង់នឹងត្រូវឈប់រៀន។ ចំណែកកម្មកររោងចក្រនឹងនៅតែទទួលប្រាក់ខែតិចតួចរស់ទាំងត្រដរ។ អ្នកជំងឺគ្មានប្រាក់បង់គ្រូពេទ្យរដ្ឋអាចត្រូវគ្រូពេទ្យទុកអោយស្លាប់បន្តទៀត។ និទណ្ឌភាព ឬអ្នកមានអំណាចល្មើសច្បាប់នៅតែគ្មានទោសទណ្ឌ ដូចជាលោក ឈូក បណ្ឌិត ជាឧទាហរណ៍អាចនឹងនៅបន្តកើតមាន។

៥ឆ្នាំទៅមុខទៀត ក្រោមការដឹកនាំរបស់គណបក្សប្រជាជនកម្ពុជាផ្តាច់មុខ ក៏មានន័យថា ព្រៃឈើខ្មែរដែលនៅសេសសល់ ដូចជាព្រៃឡង់នឹងត្រូវរលាយរូបសូន្យ ហើយអ្វីដែលប្រាកដនោះច្បាប់គ្រប់គ្រងជនអន្តោប្រវេសន៍នឹងមិនត្រូវបានអនុវត្តទៅលើជនអន្តោប្រវេសន៍វៀតណាមដែលរស់នៅកម្ពុជាខុសច្បាប់។

មើលឃើញបញ្ហានៅចំពោះមុខ និងការស្លាប់រស់របស់ជាតិដូច្នេះហើយ ទើបធ្វើអោយគណបក្សសង្គ្រោះជាតិយល់ឃើញថា យ៉ាងហោចណាស់ត្រូវតែទាមទារយកតំណែងប្រធានរដ្ឋសភាអោយបាន ដើម្បីមានលទ្ធភាពត្រួតពិនិត្យសកម្មភាពរបស់រដ្ឋាភិបាលកុំអោយគណបក្សប្រជាជនកម្ពុជាជិះសេះលែងដៃ ឬធ្វើអ្វីបានតាមចិត្តបន្តទៀត។

ចំណែកអ្នកគាំទ្រគណបក្សនេះដែលយល់ច្បាស់អំពីវិបត្តិរបស់ជាតិ ក៏មានការលះបង់ខ្ពស់ហ៊ានពុះពារជម្នះឧបសគ្គនានាមានទឹកជំនន់ជាដើមមកចូលរួមធ្វើបាតុកម្មយ៉ាងសកម្មខ្លាំងក្លាផុសផុល។ បាតុករម្នាក់ធ្វើដំណើរពីទីជនបទបានអោយដឹងថា ទឹកជំនន់ពិតជាបានបង្កការលំបាកដល់លោកក្នុងការធ្វើដំណើរមកចូលរួមបាតុកម្មនៅក្រុងភ្នំពេញ ប៉ុន្តែប្រសិនបើគណបក្សប្រជាជនកម្ពុជាដឹកនាំប្រទេស៥ឆ្នាំទៀតរូបលោក និងគ្រួសារពិតជារងការលំបាកជាងទឹកជំនន់នេះទៅទៀត។

ពួកគាត់មិនមានជំនឿលើការដឹកនាំរបស់គណបក្សប្រជាជនកម្ពុជាដែលមានលោក ហ៊ុន សែន ជាប្រមុខរដ្ឋាភិបាលទៀតទេ ពីព្រោះជិត ៤អាណត្តិ គឺស្មើនឹងជិត២០ឆ្នាំ ក្រោមការដឹកនាំផ្តាច់មុខរបស់លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន អយុត្តិធម៌សង្គម និងវិបត្តិជាតិធំៗកាន់តែមានសភាពធ្ងន់ធ្ងរពីមួយឆ្នាំទៅមួយឆ្នាំ។

ការទាមទារតំណែងប្រធានរដ្ឋសភារបស់គណបក្សសង្គ្រោះជាតិ គឺដោយសារតែ គ.ជ.ប និងក្រុមប្រឹក្សាធម្មនុញ្ញដែលគណបក្សប្រជាជនកម្ពុជាមានឥទ្ធិពលលើនោះ មិនព្រមបោះឆ្នោតឡើងវិញនៅតាមមណ្ឌលបោះឆ្នោតដែលឃើញមានបញ្ហា និងមិនបានបើកកញ្ចប់សុវត្ថិភាព "ក" នៅទីកន្លែងជាច្រើនទៀតដែលគណបក្សសង្គ្រោះជាតិប្តឹង។

នៅក្នុងប្រទេសកាន់លទ្ធិប្រជាធិបតេយ្យ ការបោះឆ្នោតឡើងវិញ ឬការរាប់សន្លឹកឆ្នោតឡើងវិញ នៅពេលមានពាក្យបណ្តឹងគួរអោយជឿជាក់ ឬមានការសង្ស័យថាមានភាពមិនប្រក្រតី នោះជារឿងធម្មតាទេ។ អ្នកសង្កេតការណ៍បោះឆ្នោតនិយាយថា បើគណបក្សប្រជាជនជាមាសទឹកដប់មិនត្រូវខ្លាចភ្លើងទេ ហើយគួរតែយល់ព្រមបង្កើតគណៈកម្មការឯករាជ្យមួយ ដើម្បីស៊ើបអង្កេតរកការពិតនៃលទ្ធផលការបោះឆ្នោត។ ពេលនោះនឹងដឹងថា បក្សណាឈ្នះឆ្នោតពិតប្រាកដ ហើយប្រជារាស្ត្រម្ចាស់ឆ្នោតក៏នឹងអស់ភាពសៅហ្មងក្នុងចិត្តដែរ៕

តមកពីទំព័រទី ១២ **ការិយាល័យ : UN ២០១២ ជាឆ្នាំ...**

គឺកើនឡើង៧៩ភាគរយបើប្រៀបធៀបទៅនឹងឆ្នាំ ២០១១ ដែលរឹបអូសបាន១៩.១គីឡូក្រាម"។

របាយការណ៍នេះបន្តថា "តួលេខនេះបង្ហាញពីចំនួនច្រើនបំផុត ដែលប្រទេសនេះមិនធ្លាប់បានធ្វើសេចក្តីរាយការណ៍ពីមុនមក"។ របាយការណ៍នេះបន្តថា លើសពីនេះទៅទៀត "ចំនួនភាគច្រើនដែលចេះតែកើនឡើងនៃអ្នកដែលត្រូវបានចាប់ខ្លួនពីបទល្មើសពាក់ព័ន្ធថ្នាំញៀន ឬអ្នកដែលត្រូវបានបញ្ជូនទៅបន្សាបគ្រឿងញៀនពាក់ព័ន្ធនឹងមេតំហ្វេតាមីន"។

ការកើនឡើងនូវការរឹបអូសគ្រឿងញៀននេះសបង្ហាញឱ្យឃើញពីប្រតិបត្តិការលបឆ្មក់ "ក្នុងចំនួនច្រើន" ចូលទីតាំងផលិតសារធាតុគីមីផ្សំដូចជាប្រេងម្រះព្រៅជាដើមជាសារធាតុផ្សំមួយដែលអាចរកឃើញនៅក្នុងដើមម្រះព្រៅព្រមទាំងមេតំហ្វេតាមីន និងថ្នាំញៀនប្រភេទ MDMA ផងដែរ។ ភាគច្រើននៃទីតាំងផលិតថ្នាំញៀនទាំងនេះស្ថិតនៅក្នុងរាជធានីភ្នំពេញ។

របាយការណ៍នេះលើកឡើងថា "ទោះជាយ៉ាងណាដោយសារតែកង្វះទិន្នន័យវិសាលភាពពិតប្រាកដនៃការផលិតថ្នាំញៀននៅក្នុងប្រទេសកម្ពុជាគ្មានអ្នកដឹងទេ"។ របាយការណ៍នេះបន្តថា ទោះជាយ៉ាងណា"ក្រុមឧក្រិដ្ឋជនឆ្លងដែនជាពិសេសមកពីអាស៊ី និងអាហ្វ្រិកខាងលិចបន្តប្រើប្រាស់ប្រទេសកម្ពុជាជាទីតាំងផលិត និងឆ្លងកាត់នៃថ្នាំញៀន ATS សារធាតុគីមីផ្សំ និងថ្នាំញៀនផ្សេងៗទៀតដូចជាកូកាអ៊ីន និងហេរ៉ូអ៊ីនជាដើម"។

របាយការណ៍នេះបន្តថា "ការប្រមូលផលខុសច្បាស់ និងការនាំចេញប្រេងម្រះព្រៅដែលអាចប្រើជាគីមីផ្សំសម្រាប់ផលិត MDMA នៅតែជាក្តីកង្វល់ផ្នែកបរិស្ថាន និងការអនុវត្តច្បាប់"។ សម្លឹងហួសពីការផលិតសារធាតុញៀនខុសច្បាប់ទាំងនេះ UNODC បានលើកឡើងថា ស្ថិតិស្តីពីចំនួនអ្នកប្រើប្រាស់ថ្នាំញៀននៅក្នុងប្រទេសកម្ពុជាគឺខុសគ្នា។ របាយការណ៍នេះគូសបញ្ជាក់ថា តួលេខផ្តល់ដោយអាជ្ញាធរជាតិប្រយុទ្ធប្រឆាំងគ្រឿងញៀន កាលពីឆ្នាំ២០១២បង្ហាញថា អ្នកប្រើប្រាស់គ្រឿងញៀនមានចំនួន៤.០៥៧ ប៉ុន្តែត្រូវបានកែប្រែកាលពីខែមីនា ឆ្នាំ២០១៣មករហូតដល់១០.០០០នាក់។

ឧត្តមសេនីយ៍ឯក មាស វីរិទ្ធ អគ្គលេខាធិការអាជ្ញាធរជាតិប្រយុទ្ធប្រឆាំងគ្រឿងញៀនបានប្រសាសន៍តាមទូរស័ព្ទកាលពីម្សិលមិញថា "អ្នកប្រើប្រាស់គ្រឿងញៀននៅទូទាំងប្រទេសមានចំនួនចន្លោះពី៥.០០០ទៅ៦.០០០នាក់"។ កាលពីខែមីនាអង្គការមិត្តសំឡាញ់ដែលជាអង្គការក្រៅរដ្ឋាភិបាលបានប៉ាន់ប្រមាណថា យ៉ាងហោចណាស់៤០ភាគរយនៃកុមារអនាថា ប្រមាណ ២០.០០០នាក់នៅក្នុងរាជធានីភ្នំពេញកំពុងប្រើប្រាស់គ្រឿងញៀន។

របាយការណ៍របស់ UNODC បានរកឃើញថា មានការកើនឡើងតិចតួចនូវចំនួនអ្នកប្រើប្រាស់គ្រឿងញៀនដែលចាក់ស៊ីរ៉ាង។ ស្របតាមទស្សននោះ ករណីចំនួនករណីអ្នកផ្ទុកមេរោគហ៊ីវក្នុងចំណោមអ្នកប្រើប្រាស់គ្រឿងញៀនដោយការចាក់ ស៊ីរ៉ាង ក៏បានកើនឡើងដែរ ពី២៤.១ភាគរយក្នុងចំណោមអ្នកប្រើប្រាស់គ្រឿងញៀនចាក់ស៊ីរ៉ាង១.៩០០នាក់ក្នុងឆ្នាំ២០១១ដល់ ២៤.៨ភាគរយក្នុងឆ្នាំ២០១២ នេះបើយោងតាមការឱ្យដឹងពីអាជ្ញាធរជាតិប្រយុទ្ធនឹងជំងឺអេដស៍។

ដើម្បីប្រយុទ្ធប្រឆាំងការប្រើប្រាស់គ្រឿងញៀនទូទាំងប្រទេសនាពេលបច្ចុប្បន្នមាន "មណ្ឌលបណ្តោះអាសន្នសម្រាប់ការអប់រំអំពីគ្រឿងញៀន និងការស្តារនីតិសម្បទា"ចំនួន១៣ក្នុងនោះមានប្រាំមួយគ្រប់គ្រងដោយរដ្ឋាភិបាល ហើយប្រាំពីរទៀតគ្រប់គ្រងដោយឯកជន។ របាយការណ៍នេះលើកឡើងថា "ទោះជាយ៉ាងណាបណ្តាទីភ្នាក់ងារអន្តរជាតិនិងទីភ្នាក់ងាររបស់រដ្ឋាភិបាលមានការព្រួយបារម្ភថា មណ្ឌលបន្សាបគ្រឿងញៀនក្នុងប្រទេសកម្ពុជាមិនបានផ្តល់ការយកចិត្តទុកដាក់ឱ្យបានគ្រប់ គ្រាន់លើការបន្សាបគ្រឿងញៀន"។

យោងតាមឧត្តមសេនីយ៍ឯក មាស វីរិទ្ធ បានឱ្យដឹងថា កម្មវិធីបន្សាបគ្រឿងញៀនតាមសហគមន៍នៅក្នុងខេត្តបន្ទាយមានជ័យ ស្ទឹងត្រែង និងបាត់ដំបង ដែលជាកម្មវិធីរួមគ្នារវាងរដ្ឋាភិបាល និង UNODC "ទទួលបានជោគជ័យ ហើយនឹងពង្រីកបន្ថែមទៀត"។

លោក ក្លេ ណាយថុន (Clay Nayton) ជាមន្ត្រីបន្សាបគ្រឿងញៀនតាមសហគមន៍ប្រចាំនៅ UNODC ក្នុងប្រទេសកម្ពុជាបានមានប្រសាសន៍ថា ការបង្កើតកម្មវិធីនេះឡើងបានបង្ហាញពីជោគជ័យរបស់មណ្ឌលបន្សាបគ្រឿងញៀនក្នុងប្រទេសកម្ពុជាដែលផ្តល់ការឧបត្ថម្ភគាំទ្រដល់អ្នកប្រើប្រាស់គ្រឿងញៀនចំនួន១.២០០នាក់។ លោកបានមានប្រសាសន៍ទៀតថា "កម្មវិធីនេះបានដំណើរការជិត៣ឆ្នាំមកហើយ"។

របាយការណ៍នេះបន្តថា ខណៈដែលការចាប់ខ្លួនពាក់ព័ន្ធគ្រឿងញៀនបានធ្លាក់ចុះ២៥ភាគរយពីចំនួន២.៣៨១នាក់ក្នុងឆ្នាំ២០១១ ដល់១.៧៨៨នាក់ក្នុងឆ្នាំ២០១២ចំនួនចាប់ខ្លួននៅតែច្រើនខ្លាំងនៅឡើយ បើប្រៀបធៀបទៅនឹងការចាប់ខ្លួនជាមធ្យម៩១៧នាក់ ដែលត្រូវបានកត់ត្រាចន្លោះពីឆ្នាំ២០០៦ និងឆ្នាំ២០១០។

ឧត្តមសេនីយ៍ឯក មាស វីរិទ្ធ បានថ្លែងថា លោកគ្មានតួលេខពាក់ព័ន្ធនឹងការរឹបអូសថ្នាំញៀនទេនៅឆ្នាំនេះ ប៉ុន្តែបានមានប្រសាសន៍ថា តួលេខអាចខ្ពស់ជាងឆ្នាំ២០១២។ លោកថ្លែងថា "ប្រៀបធៀបរយៈពេលប្រាំបួនខែដំបូងនៃឆ្នាំនេះ ទៅនឹងឆ្នាំមុន យើងធ្វើការបង្ក្រាបថ្នាំញៀនបានច្រើនជាងមុន ពីព្រោះមន្ត្រីរបស់យើងកំពុងផ្តោតការយកចិត្តទុកដាក់ខ្លាំងលើការអនុវត្តច្បាប់និងការពង្រឹងច្បាប់"៕ **សុខុម**

CELEBRATE CROSS-CULTURAL ENGAGEMENT & EXCHANGE

# INTERNATIONAL EDUCATION WEEK

## NOVEMBER 11-15, 2013 • EVENTS ALL MONTH!

### Monday, Nov. 4

**The China Triangle: China's Rise and the Future of the Western Hemisphere**

**A presentation by Kevin Gallagher, International Relations, Boston University**

**Noon, O'Leary 222**

*This event is part of the Speaker Series presented by the College of Health Sciences, College of Fine Arts, Humanities and Social Sciences, Economic and Social Development of Regions/Center for Industrial Competitiveness and the Political Science Department.* Contact Sokny_Long@uml.edu for details.

### Tuesday, Nov. 12

**International Internship Information Session**

**2 p.m., O'Leary 222**

How about a for-credit internship abroad? Take classes and intern or simply focus on the internship, it's up to you! Come hear about program options and how you can integrate a study abroad Internship into your academic plan!

*Presented by the Office of Study Abroad & International Experiences*

**Experiencing Culture Around the World via the Military**

**5–6 p.m., Fox Common**

Come grab some Middle Eastern food as our UMass Lowell Veterans share their stories and experiences of the many cultures around the world via a panel discussion.

*Presented by a panel of UMass Lowell Veterans and Cosponsored by the Office of Multicultural Affairs*

**Women of the World**

**6–7 p.m., University Suites 106B**

Come and learn about life as a WOMAN in other countries. Learn about cultural differences, similarities, and what affects women around the globe. Light refreshments will be provided and ALL ARE WELCOME.

*Presented by S.I.S.T.E.R.S. (Sisters of Integrity Striving Towards Empowerment, Respect and Success)*

*Cosponsored by the International Students & Scholars Office and the Office of Multicultural Affairs*

### Wednesday, Nov. 13

**Sample Sweets from Around the World**

**1–3 p.m., Southwick Hall Café**

An opportunity for students and faculty to sample a variety of desserts from different countries and cultures.

*Presented by The Navigators and Cosponsored by the Office of Multicultural Affairs*

**Courses with Travel: "UMass Lowell Faculty-led Study Abroad" – Info Session**

**3:30 p.m., O'Leary 222**

Come learn about how you can earn UMass Lowell credit while traveling abroad! Each summer and intersession, UMass Lowell faculty are offering their courses with travel abroad. From Literature or Comparative Law in London, Innovation & Entrepreneurship in India, History in Russia, or Digital Imaging Art in Italy, and many more! What better way to spend a few weeks of your summer!

*Presented by the Office of Study Abroad & International Experiences*

**Bachata y Dominoes**

**6–8 p.m., Fox Common**

Students will enjoy the movements and sounds of Bachata, the heated competition of dominos, and the flavors of cultural Latino foods, while learning the origins of Bachata and Dominos, and competing in tournaments where they can win prizes.

*Presented by Latin American Students Association (LASA) and Cosponsored by the Office of Multicultural Affairs*

### Thursday, Nov. 14

**Study Abroad & International Experience Fair**

**10 a.m.–1 p.m., O'Leary Library Learning Commons**

Learn what study abroad options are available to you! From semester, academic year, summer & intersession study abroad programs to experiential programs such as for-credit internships abroad, service-learning/volunteer abroad. There's a program option for you!

*Presented by the Office of Study Abroad & International Experiences*

**IRC's Cultural Festival 2013**

**7-10 p.m., Cumnock Hall, North Campus**

A celebration of the diverse community of UMass Lowell and beyond. Students, teachers, and children will gather in celebration and perform different types of traditional songs, games, and dances. $2 admission at the door.

*Presented by the UMass Lowell International Relations Club. Cosponsored by the International Students & Scholars Office and the Office of Multicultural Affairs.*

### Friday, Nov. 15

**Give a Chance Walk**

**12:30 p.m., Cushing Field Track (North Campus)**

Walk and enjoy a time with friends as we raise money to give a chance to orphans in Cambodia. To participate in the walk, email Monica_Tak@student.uml.edu before Nov. 6th.

*Presented by the Cambodian American Student Association and Cosponsored by the Office of Multicultural Affairs*

**22nd Annual Massachusetts Council for International Education (MaCIE) Conference**

**Global Engagement: Diverse Opportunities**

**9-4 p.m., UMass Lowell Inn and Conference Center, 50 Warren St. Lowell, MA**

A day of discussion about the field of International Education and how we can take advantage of all the opportunities available to us in a new global society as educators and students. For more info and registration, email isso@uml.edu. Limited free tickets available.

*Presented by the Massachusetts Council for International Education and cohosted by the International Students & Scholars Office and Middlesex Community College*

### Saturday, Nov. 16

**Annual Interfaith Thanksgiving Celebration: Ways of Praise**

**4 p.m. Worship, Central Congregational Church, One Worthen St., Chelmsford, MA 01824**

Procession of Light and Multi-Ethnic Meal to follow worship at First Parish Unitarian Universalist Church, Two Westford St., Chelmsford, MA 01824

Participating communities include: Hindu, Buddhist, Jewish, Christian, Muslim, Sikh, Unitarian Universalist. All are welcome. Optional donation—bring a non-perishable food item or a monetary contribution for the Open Pantry of Greater Lowell. Contact Imogene_Stulken@uml.edu for details and to sign up for free bus transport.

*Presented by the Greater Lowell Interfaith Leadership Alliance (GLILA)*

### Monday, Nov. 18

**Cooling the Planet, Clearing the Air: Co-Pollutants, Climate Policy, & Carbon Pricing**

**A presentation by James Boyce, Economics Department, UMass Amherst**

**Noon, O'Leary 222**

*This event is part of the Speaker Series presented by the College of Health Sciences, College of Fine Arts, Humanities and Social Sciences, Economic and Social Development of Regions/Center for Industrial Competitiveness and the Political Science Department, the Department of Work Environment, the Climate Change Initiative, and the Department of Economics.* Contact Sokny_Long@uml.edu for details.

Dining halls will serve a variety of international dishes all week! For menu updates, go to www.uml.edu/dining.




*Learning with Purpose*

**Visit www.facebook.com/umlowellisso/events for all IEW details.**

INTERNATIONAL EDUCATION WEEK EVENTS COORDINATED BY THE INTERNATIONAL STUDENTS & SCHOLARS OFFICE AND THE OFFICE OF MULTICULTURAL AFFAIRS

## តមកពីទំព័រទី ១ ខ្មែរយោបល់ព្រោះតែចង់សង្គ្រោះជាតិ

អ្នកអានរបស់យើងក្នុងកិរិតគុណភាពខ្ពស់គួរឱ្យជក់ចិត្តជឿបានជាពិសេសផ្តល់នូវច្រកចេញនៃបញ្ហាច្រើនខែឆ្នាំមុនព្រឹត្តិការណ៍កើតឡើង ដូចជាចង្អុលថា "ជ័យជំនះនៃបក្សប្រឆាំងអាចកើតឡើងបាន លុះត្រាតែមានការរួមសាមគ្គីគ្នារវាងគណបក្សសម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស" មួយទៀតយើងទាយថា "សម រង្ស៊ី មុខនឹងត្រឡប់ទៅកម្ពុជានៅមុនពេលបោះឆ្នោតមន្ទិច បើទោះជាមាន ឬគ្មានការលើកលែងទោសក៏ដោយ" នេះដោយយោងទៅតាមការស្គាល់ប្រវត្តិអ្នកនយោបាយកម្ពុជា និងយោងទៅតាមការស្គាល់គន្លឹះនៃការបោះឆ្នោតក្នុងលទ្ធិប្រជាធិបតេយ្យក្នុងសកលលោក ។ យើងបានបន្តការវិភាគរបស់យើងទៅលើការជ្រើសរើសមាគ៌ា "អហឹង្សា" របស់គណបក្សសង្គ្រោះជាតិថាជាមធ្យោបាយច្បាស់លាស់ហើយប្រសើរបំផុតសម្រាប់ផ្តួលរំលំរបបផ្តាច់ការណ៍មួយដោយមិនចាំបាច់បង្ហូរឈាមរាស្ត្រខ្មែរ ។ ហើយយើងក៏បានទស្សទាយដែរថា "លោក ហ៊ុន សែន គួរតែទប់ស្កាត់កុំឱ្យបាតុកម្មមហាជនរបស់គណបក្សសង្គ្រោះជាតិកើតឡើងបានឱ្យសោះដោយត្រូវទទួលយកការទាមទារមួយចំនួនមកដោះស្រាយ បើមិនដូច្នោះទេបាតុកម្មនោះ តែកើតហើយមិនអាចបញ្ចប់ដោយគ្មានការដោះដូរដៃនៃអំណាចទេ ហើយបើមានព្រឹត្តិការណ៍ហិង្សានៅក្នុងនោះទៀត ក្រុមលោក ហ៊ុន សែន ទាំងមូលក្នុងគណបក្សប្រជាជនកម្ពុជានឹងត្រូវប៉ះពាល់ជាមិនខាន" ។

ព្រឹត្តិការណ៍នយោបាយខ្មែរបានវិលទៅតាមលំនាំដូចដែលយើងបានត្រួសត្រាយធ្វើឱ្យលោកអ្នកអានអាចមានការពិចារណាគាំទ្រ ឬប្រឆាំងដោយមានពេលគិតគ្រប់គ្រាន់រួចមកហើយៗនូវមានអ្វីនឹងអាចកើតឡើងជាបន្តទៅទៀត? ។ គណបក្សប្រជាជនបានសម្រេចចិត្តដឹកនាំប្រទេសម្នាក់ឯងដោយមិនបង្ហាញថា ខ្លួនត្រូវការគណបក្សសង្គ្រោះជាតិ ដើម្បីដំណើរការរបស់រដ្ឋាភិបាលថ្មីនោះទេ ក៏ប៉ុន្តែតាមពិតទៅរដ្ឋធម្មនុញ្ញខ្មែរដែលបានតាក់តែងអនុម័តកាលពីឆ្នាំ១៩៩៣តម្រូវឱ្យប្រទេសដឹកនាំជាពហុបក្ស....អ៊ីចឹងទេប្រទេសនឹងជួបប្រទះការរាំងស្ទះដឹកនាំប្រទេសតែម្នាក់ឯងមិនកើតដែលជាហេតុត្រូវតែរដ្ឋាភិបាលថ្មីនោះទទួលយកនូវលក្ខខណ្ឌខ្លះជាចាំបាច់ ដើម្បីគ្រប់គ្រង ។ ខាងគណបក្សសង្គ្រោះជាតិជាមួយនឹងកម្លាំងបាតុករបានបង្ហាញហើយថា ខ្លួនចង់បានតំណែងប្រធានរដ្ឋសភាដែលមានតុល្យភាពទប់រដ្ឋាបាលលោក ហ៊ុន សែន បានបើមិនបានទេ ត្រូវតែកែហិបឆ្នោតរកយុត្តិធម៌ឱ្យម្ចាស់ឆ្នោត ។ យើងយល់ថា ការកែហិបឆ្នោតអាចនាំគណបក្សប្រជាជនរបូតតំណែងជានាយករដ្ឋមន្ត្រី និងប្រធានរដ្ឋសភាតាមតែបើឱ្យតំណែងប្រធានរដ្ឋសភាទៅតាមសំណូមពរគណបក្សប្រជាជនអាចការពារមុខតំណែង និងគណបក្សខ្លួនបាន៥ឆ្នាំទៀត ។

ចលនាអហឹង្សារបស់គណបក្សសង្គ្រោះជាតិជាវិធីគំរូដ៏ឆ្លាតវៃអាចនាំប្រជាជាតិទៅដល់គោលដៅនៃប្រជាធិបតេយ្យសេរីបាន ដោយប្រើឱកាស និងបញ្ញា ។

គណបក្សប្រជាជនអាចនឹងភ្លាត់ដំណំ ប្រសិនបើហ៊ានប្រើ "អំពើហិង្សា" ដែលជាជំនាញរបស់ខ្លួន....តែដូចគ្នានេះដែរ គណបក្សសង្គ្រោះជាតិក៏អាចធ្លាក់ចូលក្នុងការភ័ន្តច្រឡំធំដូចគ្នា ប្រសិនបើយកកំហឹងទៅប្រើទល់កំហល់ទៅវិញ ។ ក្នុងនាមជាអ្នកគាំទ្រចង់ឃើញលទ្ធផលនៃការបោះឆ្នោតត្រឹមត្រូវការតែងតាំងមន្ត្រីតាមគន្លងច្បាប់ភ្លាមនោះ គឺជាបញ្ហាស្លាប់រស់របស់គណបក្សប្រជាជនគេតែងតែទុកឱកាសឱ្យក្រុមនេះសម្រេចផ្លាស់ប្តូរខ្លួនឯងប្រឈមមុខនឹងសំពាធដែលខ្លួនកំពុងទទួល។ អ្នកគាំទ្រឆ្លាតវៃគេមិននាំគ្នាបញ្ឈប់សំពាធទេ គេរឹតតែបន្ថែមទម្ងន់ថែមទៀតផង ការបន្ថយសំពាធ គឺការបន្ថយសមាណចិត្តសង្គ្រោះជាតិរបស់ខ្លួន និងបន្ថយជំនឿទៅលើសកម្មជនជួរមុខរបស់ខ្លួនដែលជាឱកាសធ្វើឱ្យបច្ចាមិត្តប្រើប្រាស់ចំណុចខ្សោយនោះបាន ៕

## តមកពីទំព័រទី ២៦ វត្តសូរិយារង្សីនៅហ្វីឡាដែលហ្វៀ...

ទៅមុខទាំងមួរម៉ងចិត្តទៅ។ ចុះអ្នកណាសប្បាយអីក្នុងការរង់ចាំដំណឹងពីតុលាការ? ក្រុមចាស់ក៏ដូចក្រុមថ្មីមិនមែនសប្បាយចិត្តទៅឈរមុខរង់ក្រចកសេះចាំស្តាប់ចៅក្រំកាត់ទោសខ្លួននោះអីទេ។ បើដូច្នោះក្នុងនាមជាបងប្អូនរួមឈាមកំសត់កម្រជាមួយគ្នាពីបាកអីនឹងវិលមករកគ្នាផ្សះផ្សារដំបៅឱ្យគ្នាទៅវិញទៅមកដោយក្តីអាណិតស្រឡាញ់នៃជនជាតិមួយដែលត្រូវជាតិគេមួយទៀតជិះជាន់ធ្វើបាបងើបមុខមិនរួចរាប់សតវត្សមកហើយមិនគិតទៅគិតអីរឿងចាញ់ឈ្នះគ្នាឯងបន្តិចបន្តួចប៉ុនចុងចង្អឹះនេះ។ កុំភ្លេចថា ខ្ញុំរង់ចាំបំរើបងប្អូនដោយសប្បាយរីករាយក្នុងការផ្សះផ្សារបងប្អូនយើងនេះ,កុំភ្លេចសរសេរមកបញ្ជាខ្ញុំថា ត្រូវឱ្យខ្ញុំធ្វើយ៉ាងណា ដើម្បីបងប្អូនយើងអាចជួបគ្នាពន្លត់ភ្លើងនេះឱ្យទាន់ពេលមុនតុលាការគោះញញួរបញ្ចប់សេចក្តីធ្វើឱ្យខ្មែរខាតបង់ទាំងអស់គ្នា,ប្រញាប់ឡើងណាបងប្អូន!!! ៕

**ដោយៈ គឹមភឿន**

# វត្តសុរិយារង្សីនៅហ្វីឡាដែលហ្វៀនៅតែបន្តមានជំលោះ



**តពីលេខមុន**

ក្នាក៏មានពាក្យចចាមអារាមថា បាក់បែកនេះមកពីពួកខ្មែរក្រោមនឹងខ្មែរកណ្តាល ទោះទែងគ្នា ឬមកពីខ្មែរក្រោមនឹងសហព័ន្ធបែកបាក់ប្រទស្តាវាយនឹងគ្នាទេ ។ល។ គ្មាន ឬបុគ្គលណាម្នាក់កែតម្រូវទាល់តែសោះទុកឱ្យអ្នកណាចង់យល់ម៉េចក៏យល់ទៅ ។ ចំណែកលោក ហាំង វឿង ចេះតែទន្ទេញពាក្យដដែលៗថា បើអ្នកណាចង់ដឹងរឿងពិតឱ្យមកសួរខ្ញុំ ។ អស់លោកមិនព្រមយល់ថា គឺអស់លោកនេះ ហើយជាអ្នកដែលត្រូវខំឱ្យគេដឹងរឿងពិត ព្រោះមិនមែនអ្នកទាំងអស់ដែលមិនយល់រឿងពិតនោះទេ ដែលត្រូវខាតប្រយោជន៍ផ្ទុយទៅវិញ គឺអស់លោកទៅវិញទេ ដែលត្រូវខាតប្រយោជន៍ ព្រោះក្រុមលោកតែពីរនាក់សោះដែលជាសមាជិកសហព័ន្ធទុកឱ្យគេទាំងអស់គ្នាយល់ជ្រួតជ្រាបថា ជម្លោះនេះជាជំលោះរវាងខ្មែរក្រោមនឹងពួកសហព័ន្ធទៅវិញទៅកើត ។ ត្រូវដឹងថា សហព័ន្ធខ្មែរក្រោមខំសាងកេរ្តិ៍ឈ្មោះជាច្រើនទសវត្ស ទើបបានមកដល់ពេលនេះ អស់លោកទាំងពីរនាក់ ឬក៏មន្ត្រីធំៗនៃសហព័ន្ធនៅមូលដ្ឋានហ្វីឡានេះត្រូវចេញមុខកែតម្រូវពីព័តិមាននេះភ្លាមៗ គេយល់យ៉ាងនោះ សហព័ន្ធខូចប្រយោជន៍ធំណាស់ សត្រូវរបស់យើងគ្មានខំបន្តិចណាសោះគេបានទទួលផលប្រយោជន៍យ៉ាងធំ: គឺដំណឹងបាក់បែកគ្នារវាងខ្មែរក្រោមនឹងសហព័ន្ធ។ បើបាក់បែកជាមួយខ្មែរក្រោមទៅហើយសហព័ន្ធនៅធ្វើអីកើតទៀត? ម៉េចក៏អស់លោកនៅស្ងៀមអញ្ចឹងទៅកើត? ។ ឧទាហរណ៍មួយទៀតដូចកាលជំនាន់ទសវត្ស៦០ពួកយៀកកុងនៅយួនខាងត្បូងបានឱ្យខ្មែរក្រោមពាក់បន្ទោងព្រះឆាយាលក្សសម្តេចឪមុននឹងចូលច្បាំងជាមួយទាហានព្រៃនគរដោយយកលេសថា ច្បាំងយកដីកម្ពុជាក្រោមថ្វាយសម្តេចឪ។ សម្តេចឪទ្រង់ជ្រាបរឿងនេះហើយតែលោកនៅស្ងៀមមិនព្រមស្រែកតែមួយវេះថា: "កូនចៅទាំងឡាយ! កុំចាញ់បោកគេៗមិនមែនយកដីនោះមកថ្វាយឪទេកូន!" មធ្យោបាយផ្សព្វផ្សាយលោកមានទៅខ្វះអីសុខចិត្តនៅស្ងៀមទុកឱ្យកូនចៅបន្តស្លាប់ខ្លួនដោយសារចាញ់បោកគេព្រោះតែចង់បំរើឪ!! ព្រោះតែខ្វះការឆ្លៀសវៃនៃព្រះអង្គនេះហើយបានជាកូនចៅព្រះអង្គនៅតែបន្តចាញ់បោកគេឱ្យងាប់ខ្លួនទាំងពូជ ។ យើងត្រូវរើសយកកំហុសទាំងឡាយរបស់អ្នកដើរមុនមកធ្វើជាមេរៀន បើបានជ្រាបរឿងទាំងនេះហើយសុំអស់លេកដែលមានភារៈកិច្ចសបំរើសង្គម.សហគមន៍នឹងជាតិនោះ ដូចសហព័ន្ធខ្មែរកម្ពុជាក្រោមជាដើមមិនគួរនៅស្ងៀមទៀតទេពេលមានរឿងដែលគេយល់ច្រឡំ ឬយល់ខុសអំពីយើង។ ខ្ញុំសុំអង្វរដោយស្មោះថា:"កុំឱ្យខ្ញុំឮទៀតនូវពាក្យដូចជាថា អ្នកណាចង់ដឹងរឿងពិតត្រូវមកសួរខ្ញុំ-ឬអ្នកណាគេមិនចង់មកវត្តនេះគេទៅវត្តណាស្រេចតែចិត្តគេទៅខ្ញុំមិនខ្វល់ទេ។" អញ្ចឹងហើយបានជាវត្តយើងមានសភាពដូចសព្វថ្ងៃនេះ។ វាចារទាំងនេះសម្រាប់ពពួកអ្នកមិនចេះទទួលការខុសត្រូវគេនិយាយទេ មិនមែនជាពាក្យសម្រាប់អ្នកដឹកនាំសង្គមយកមកប្រើប្រាស់ដោយអត់ទទួលខុសត្រូវយ៉ាងនេះសោះ!។

នេះជាលិខិតចំហធម្មតាសរសេរតែបួនដប់បន្ទាត់វាគ្រប់គ្រាន់ណាស់ទៅហើយ សុំទោសចុះដែលបានសរសេរជិតទៅ៩ទំព័រដោយចង់ឱ្យបងប្អូនបានយល់នឹងឃើញនូវបញ្ហាជាច្រើនយើងច្រើនតែមើលរំលង ហើយវាបាននាំមកនូវផលវិបាកដ៏ច្រើន។ យើងទាំងអស់គ្នាត្រូវរៀនសូត្រ.កែតម្រូវទាំងអស់គ្នាឱ្យទាន់ពេល។ ដើម្បីបញ្ចប់លិខិតដ៏មហាវែងនេះខ្ញុំចង់និយាយរឿងមួយខ្លីទៀតជូនបងប្អូនយើងស្តាប់ដើម្បីពិចារណា។ ខ្ញុំនៅតែជឿថា លោក ង៉ោ ថាច់ង៉ុក គ្មានបំណងកាន់តំណែងជាប្រធានគណកម្មការជាប់ឆ្នោតអីនោះទេ ដោយគាត់មានវិបត្តិគ្រួសារបន្តិចបន្តួចផង.ដោយគាត់បានផ្លាស់ផ្ទះទៅនៅឆ្ងាយពីវត្តហើយមិនសូវបានមកវត្តផងក្នុងប៉ុន្មានឆ្នាំនេះ។ ប្រហែលគាត់ជឿតាមពាក្យឃោសនាពីពួកក្រុមដែលបានប្រព្រឹត្តកំហុសហើយចង់កាយកប់លុបបំបាត់ការធ្វើខុសរបស់ខ្លួននាំឱ្យខាតប្រាក់រាប់ម៉ឺនដុល្លារនោះហើយ (គាត់ក៏ជាអ្នកធ្លាប់តែបានជួយកសាងវត្តសុរិយរង្សីនេះយ៉ាងសកម្មផងនោះ) បានជាគាត់លោតចូលមកចង់ដោះស្រាយបញ្ហាជាប់គាំងរបស់វត្តយើងដោយជាប់អន្ទាក់របស់អ្នកបង្ករឿងនេះទៅ។ ខ្ញុំសំអាងលើពាក្យលោក ង៉ោ ថាច់ង៉ុក និយាយរកខ្ញុំតាមទូរស័ព្ទមកកាន់ខ្ញុំថា:

ពូអើយ! បើពូមានការលំបាកមួយខ្ញុំមានការលំបាក១០ជាងពូឯនោះ ។ ខ្ញុំសុំទោសប្រសិនការសន្និដ្ឋានរបស់ខ្ញុំខុស។

សំដីណឹងបញ្ជាក់ឱ្យយើងដឹងថា គាត់ក៏មានក្តីលំបាកចិត្តដែរដោយសុខៗយូរហើយស្រាប់តែចូលមកពាក់ពាន់រឿងទទួលថ្នបាក់ដោយពុំបានដឹងខ្លួនជាមុន: ទៅមុខមិនរួច, ទម្លាក់ចោលក៏មិនកើត...ចេះតែទ្រាំដើរ **តទៅទំព័រទី ២៥**

# វិស្វកម្មក្នុងចិត្តមនុស្ស
## The human inner engineering

តពីលេខមុន


និពន្ធដោយ : ម៉ៅ ច័ន្ទសំណុំ

បើកផ្លូវឱ្យរាល់ថាមពលអវិជ្ជមាន និងវិជ្ជមានទាំងនោះ គេមានឱកាស និងសំដែងចេញនឹងចាក់ក្បាច់តាមដំណើរក្រឹត្យក្រមធម្មជាតិ។ ស្វាគមន៍មានន័យថាទទួលយកគ្រប់រូបភាពគ្រប់បាតុភូត បណ្ឍប់សកម្មភាពខួរក្បាលទាំងអស់ពុំគិតពិចារណាពុំប្រៀបធៀបពុំបកស្រាយពុំប្រតិកម្ម។

ធ្វើបានដូច្នេះ អ្នកនឹងពិសោធន៍ចេញផុតពីស្រ្តេះនេះ ពិតប្រាកដណាស់ចូរសាកល្បងពិសោធន៍លមើលទៅអ្នកនឹងបានឃើញជាក់ស្តែងពុំខានឡើយ ។ ចំពោះទុក្ខកង្វល់នានាការឈឺចាប់ក្នុងចិត្ត ទុក្ខក្រៀមក្រម ភ័យព្រួយ ប្រច័ណ្ឌច្រណែន គំនំ រឿងរ៉ាវពិសពុលពីអតីតកាល សូមអ្នកអនុវត្តន៍ ដូចដែលខ្ញុំបានរៀបរាប់ខាងលើនេះ នឹងពិសោធន៍ ការរួចរំដោះភ្លាមៗអស្ចារ្យណាស់ ។ សូមប្រណិបត្តិរបៀបនេះ ឱ្យកាន់តែញឹកញាប់នេះរឹតតែប្រសើរឡើងទៀត ។

ផ្អែកលើការយល់ដឹងថ្មីខាងលើនេះ គួរយើងគ្រប់គ្នាសើរើពិនិត្យខ្សែជីវិតម្នាក់ៗឡើងវិញ តើយើងស្ថិតនៅក្នុងជំពូកមនុស្សបែបណាជាមនុស្សសាមញ្ញជាអ្នកត្រាស់ដឹងជាន់ទាបជាអ្នកត្រាស់ដឹងជាន់ខ្ពស់ បើពុំទាន់យល់ច្បាស់ទេ សូមអ្នកអានអត្ថបទនោះឡើយវិញ ជាច្រើនសាររហូតដល់ពេលមួយនោះអ្នកនឹងដុះគំនិតកើតបំណងចង់រៀបចំជីវិតយ៉ាងណាហើយនោះជាមាត់ទ្វារ នាំអ្នកទៅរកការអភិវឌ្ឍន៍ សេរីភាព និងរីកចំរើនទៅអនាគត។

ភាគ ៤ ការប្រណិបត្តិឆ្ពោះទៅបំផុះ និងប្រើប្រាស់សតិនឹងឱ្យទូលំទូលាយក្នុងជីវិតប្រចាំថ្ងៃនេះ :

អ្នកអាចសួរមកខ្ញុំថា តើធ្វើដូចម្តេច ដើម្បីបង្កើតនឹងហៅរក ឬគាស់បំផុសសតិដឹងក្នុងខ្លួនមនុស្សយើងនេះ ឱ្យងើបឡើងបំរើគោលដៅរំដោះចិត្ត និងទទួលបាននូវសេរីភាពសុខក្សេមក្សាន្ត មនោរម្យក្នុងជីវិត?

១ សូមអ្នកម្ចីម្នា រកហាក់រៀនវិជ្ជាសមាធិដល់ខ្លួនអ្នកឱ្យបានសំរេច កុំបីខានឡើយនៅពេលដែលអ្នកនៅមានជីវិតរស់នៅជាមនុស្សនេះ ។ អ្នកនឹងរកឃើញព្រះធម៌ព្រះនិព្វានក្នុងខ្លួនអ្នកយ៉ាងពិតប្រាកដ។ ព្រះអង្គហ្គោសុណាន់ដាមានព្រះសង្ឃដីការថា បើជាតិនេះ អ្នកពុំទាន់រកឃើញព្រះធម៌នោះទេ នោះអ្នកនឹងត្រូវវង់ចាំជាច្រើនជាតិទៅមុខទៀត ។ គួរអ្នករករៀនវិជ្ជាសមាធិវិបស្សនា តាមបែបព្រះពុទ្ធ សាសនា ដែលមានស្រាប់នៅប្រទេសកម្ពុជាយើង ។ សូមជម្រាបថាវិធីសមាធិ វិបស្សនា ដឹកនាំដោយ លោក គ្រូហ្គោអេនកា កំពុងពេញនិយមលើសកលលោក ។ វិធីនេះងាយស្រួល និងសមស្របនឹងមនុស្សទំនើបនាពេលបច្ចុប្បន្ន ។ មនុស្សរាប់លានអ្នកលើភពផែនដីនេះ កំពុងតែបេះផ្លែផ្កា នឹងសំរេចផលទទួលសុខុដុម រមនា នឹងសុភមង្គល ចេញពីវិធីសមាធិរបស់លោកគ្រូហ្គោអេនកានេះ ។ ឱកាសមកដល់ហើយ សូមអ្នកកុំឱ្យពេលវេលាឆ្លងផុតដោយពុំបានទទួលអំណោយដ៏ឧដុង្គឧត្តមមកពីវិជ្ជាសមាធិនេះ។

២ តើក្នុងជីវិតជាក់ស្តែងអ្នកគួរប្រព្រឹត្តហាត់រៀន ធ្វើដូចម្តេច ដើម្បីឱ្យសតិនេះ ផុះដុះរីកលូតលាស់ក្នុងខ្លួនអ្នក?

ចម្លើយដោយខ្លីនោះ គឺចូរអ្នកចងចាំគោលការរួម :

អ្នកពុំមែនជារូបកាយនេះទេ អ្នកពុំមែនជាលំហូរគំនិតនេះទេ អ្នកពុំមែនជាអារម្មណ៍នេះទេ អ្នកពុំមែនជាការប្រតិកម្មនេះទេ ។

អ្នកពុំមែនជាមនោសញ្ចេតនានេះទេ អ្នកពុំមែនជាកំហឹងជាការព្រួយបារម្មណ៍ទុកក្រៀមក្រំនេះទេ អ្នកពុំមែនជាចិត្តមនុស្សនេះទេ ។ អ្នកជាមនុស្សមើលពីក្នុងខ្លួន(THE SEER) អ្នកជាមនុស្សសម្លឹងមើលពីបណ្តួលខ្លួនមនុស្សមកអ្នកជាសតិដឹងអ្នកជាចិត្តបរិសុទ្ធដែលជាធម្មជាតិពិតរបស់មនុស្ស ។ សតិដឹងនេះអាចមានសមត្ថភាពមើលពីក្នុងខ្លួនមក ។ អ្នកអាចសំឡឹងមើលរូបកាយពីក្នុងខ្លួនមកអ្នកអាចសំឡឹងមើលលំហូរគំនិតអារម្មណ៍មនោសញ្ចេតនាពីក្នុងខ្លួនមកដោយពុំពិចារណា ពុំប្រៀបធៀប ពុំរិះគិត ពុំប្រើខួរក្បាលបកស្រាយអ្វីឡើយ ។ ចូរអ្នករៀនទំលាប់មើលពីក្នុងខ្លួនមកដូចខ្ញុំជំរាបខាងលើនេះ បើទំលាប់ដូច្នេះយូរៗទៅអ្នកនឹងបង្កើតទំលាប់ថ្មីឱ្យខ្លួនអ្នកជាពុំខានឡើយ ហើយនឹងទទួលកូនសោរសំរាប់រំដោះចិត្តពី អពមង្គល ពីភាពខ្មៅងងិតពិសពុលទាំងឡាយ ។ ការចេះសំឡឹងមើលពីក្នុខ្លួនមកនេះ ក្នុងភាសាអង់គ្លេស គេនិយាយថា (To be aware or To withess what veris happening engide and outside right now) បើអ្នកអាចប្រណិបត្តិដូច្នេះបានអ្នកនឹងចាក់ផុតអំពីភាពវង្វេង អំពីអវិជ្ជមាន ព្រោះអ្នកស្គាល់ខ្លួនអ្នកជានរណាហើយ ។ **តទៅលេខក្រោយ**

# ជោគជតារាសីលោកអ្នក
## ទាំង១២ប្រចាំឆ្នាំរោង

### ឆ្នាំជូត
លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្ដីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមូលបង្កាច់បង្ខូចកេរ្តិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្លានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕

### ឆ្នាំឆ្លូវ
លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទីឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះ ប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបានដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕

### ឆ្នាំខាល
រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញយ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀបដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕

### ឆ្នាំថោះ
ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕

### ឆ្នាំរោង
រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្ដល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនល្អលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នាបើនៅឆ្ងាយ ៕

### ឆ្នាំម្សាញ់
រាល់កិច្ចការដែលលោកអ្នកបើងប្រាថ្នាជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការបៀងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕

### ឆ្នាំមមី
លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕

### ឆ្នាំមមែ
អាចពោលបានថា លោកអ្នកមានសេចក្ដីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរ នៅទីណាក្ដីគួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕

### ឆ្នាំវក
រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវរលាយសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕

### ឆ្នាំរកា
លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្ដាប់ឱវាទគ្នា ៕

### ឆ្នាំច
នៅក្នុងរយៈពេលនេះលោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិនិងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើ តែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕

### ឆ្នាំកុរ
រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕

# ស្វែងយល់អំពីជម្ងឺលើសឈាម (សម្ពាធឈាមខ្ពស់)



បច្ចុប្បន្ននេះ ជំងឺលើសឈាមត្រូវបានគេចាត់ទុកថា ជាជំងឺអាក្រក់កំពុងតែរាតត្បាតមនុស្សស្ទើរទូទាំងពិភពលោក ជាពិសេសមនុស្សវ័យចំណាស់ងាយនឹងទទួលរងគ្រោះពីជំងឺនេះជាងគេ ហើយក៏មានមនុស្សវ័យកណ្តាល ឬក្មេងៗខ្លះផងដែរ។

មនុស្សភាគច្រើនកើតជម្ងឺលើសឈាមដោយមិនដឹងខ្លួនជាច្រើនឆ្នាំ។ ព្រោះថា ការលើសឈាម ឬសម្ពាធឈាមលើសជួនមិនបង្ករោគសញ្ញាឬវិបត្តិអ្វីទាំងអស់អ្នកជម្ងឺមានសភាពធម្មតា។ ប៉ុន្តែគាត់អាចមានរោគសញ្ញាខ្លះដែលស្តែងឡើង ដូចជាឈឺក្បាលនៅពេលយប់ ឬពេលងើបពីការទទួលទានដំណេកនៅពេលព្រឹកព្រលឹម ហ៊ឹងត្រចៀក អស់កម្លាំងគ្មាន មូលហេតុ ឬវិលមុខជាដើមអ្នកដែលកើតជំងឺលើសឈាមមានអត្រាការស្លាប់ខ្ពស់ និងមានអាយុខ្លីជាងធម្មតា២០ឆ្នាំ ។ មូលហេតុដែលបណ្តាលអោយស្លាប់ភាគច្រើន គឺដាច់សរសៃ។ បើសិនជាលោកអ្នកដែលកើតជម្ងឺលើសឈាមមិនបានមកធ្វើការព្យាបាលឱ្យបានទាន់ពេលទេនោះ លោកអ្នកអាចនឹងជួបនូវបញ្ហាធ្ងន់ធ្ងរជាច្រើន ដូចជាជម្ងឺបេះដូង ជម្ងឺខ្សោយតម្រងនោមដាច់សរសៃឈាមក្នុងខួរក្បាលជាដើម។ លើសពីនេះជម្ងឺលើសឈាមអាចបាត់បង់ជីវិតថែមទៀតផង បើសិនជាលោកអ្នកមិនបានធ្វើការថែទាំសុខភាពឱ្យបានដិតដល់ទេនោះ។

**១-មូលហេតុបង្ករជាជំងឺលើសឈាម**

មូលហេតុសំខាន់ដែលនាំអោយកើតជំងឺនេះ គឺដោយសារតែរាងកាយបានទទួលសារជាតិខ្លាញ់ខ្ពស់បណ្តាលអោយបរិមាណជាតិខ្លាញ់ក្នុងឈាមមានច្រើនខុសធម្មតាដែលបណ្តាលអោយមានជាតិខ្លាញ់កកស្ទះក្នុងសរសៃឈាមធ្វើអោយសរសៃឈាមឡើងរឹងនិងតៀ្សត បើសិនជាសរសៃឈាមមានទំហំមិនសូវជាមានបញ្ហាទេ តែបើសរសៃឈាមតូចនឹងនាំអោយឈាមរត់មិនបានល្អ ហើយទៅចិញ្ចឹមបេះដូងមិនបានគ្រប់គ្រាន់ និងធ្វើអោយសាច់ដុំបេះដូងខ្វះអុកស៊ីហ្សែនបណ្តាលអោយកើតមានអាការឈឺដើមទ្រូង។

តាមការស្រាវជ្រាវគេបានរកឃើញថា មានមូលហេតុជាច្រើនដែលបណ្តាលអោយកើតជំងឺលើសឈាម ហើយមួយភាគធំ គឺបណ្តាលមកពីជំងឺក្រលៀន រឺជំងឺក្រពេញទីរ៉ូអីត (Thyroid gland) ជាដើម។

ជួបជាមួយលោកវេជ្ជបណ្ឌិត សេង សេរី ឯកទេសជម្ងឺទឹកនោមផ្អែមនៅមន្ទីរពេទ្យព្រះកុសុមៈ និងប្រាប់ពីវិធីនៅក្នុងការថែទាំសុខភាពរបស់អ្នកជម្ងឺលើសឈាម ដើម្បីឱ្យលោកអ្នកជ្រាប និងយល់ឱ្យកាន់តែច្បាស់អំពីបញ្ហានេះ។

**ជម្ងឺលើសឈាម**

ជម្ងឺលើសឈាមគឺជាសម្ពាធឈាមនៅក្នុងខ្លួនរបស់មនុស្សឡើងខ្ពស់ខុសពីធម្មតាដែលអាចធ្វើឱ្យសរសៃឈាមក្នុងខួរក្បាល ស្ទះឬដាច់អាចធ្វើឱ្យមនុស្សយើងស្លាប់មួយចំហៀងខ្លួន៕

# ខ្មែរអ្នកជាតិនិយម

**តពីលេខមុន**

ពេលនោះឯង ទើបជប៉ុនបានដឹងអស់នូវអំពើដើរខ្សែលើរបស់បារាំង ។

ថ្ងៃទី២០ កញ្ញា ១៩៤៤ កងទ័ព ស.រ.អា ដឹកនាំដោយឧត្តមសេនីយ៍ ម៉ាក្កាធើរ (Douglas MacArthur) បានឡើងគោកនៅលើប្រទេសហ្វីលីពីនហើយយកបានទីក្រុងម៉ានីល នៅថ្ងៃទី២៥ កុម្ភៈ ១៩៤៥ ។ កាលពីថ្ងៃទី៧ កុម្ភៈ ១៩៤៥ កងទ័ពអាកាសអាមេរិកបានហោះចេញពីមូលដ្ឋាននៅប្រទេសឥណ្ឌា ហើយបានទៅទម្លាក់គ្រាប់បែកលើទីតាំងជប៉ុននៅឥណ្ឌូចិន និងប្រទេសសៀម ។ ទីក្រុងភ្នំពេញកាលពីថ្ងៃទី ០៧ កុម្ភៈនោះ ក៏បានស្គាល់ការទម្លាក់គ្រាប់បែកជាលើកដំបូងបង្អស់ក្នុងប្រវត្តិសាស្ត្រខ្មែរ ដែលបានបណ្ដាលឱ្យស្លាប់ និងរបួសបណ្ដាជនរាប់រយនាក់នៅត្រង់ផ្សារកណ្ដាលក្បែរវត្តឧណ្ណាលោមក្រុងភ្នំពេញ ។

ដោយឃើញព្រឹត្តិការណ៍ដូចនេះ ជប៉ុនបង្ខំឧត្តមនាវី ដឺគូ ឱ្យទម្លាក់សន្លឹកបៀររបស់ខ្លួនដោយទាមទារឱ្យកងទ័ពបារាំងទាំងអស់នៅឥណ្ឌូចិនមកនៅក្រោមបញ្ជាការរបស់ជប៉ុន ។ ដល់ ដឺគូ មិនយល់ព្រមជប៉ុនក៏ចាប់វាយភ្លាមនៅថ្ងៃទី ០៩ មីនា ១៩៤៥ ។ ក្នុងកំឡុងតែយប់ប៉ុណ្ណោះកងទ័ពបារាំងទាំងមូលនៅឥណ្ឌូចិនបានរលាយខ្សុល ហើយដំណាលគ្នានោះស្ថាប័នអាណានិគមនិយមបារាំងក៏ត្រូវរលំរលាយដែរលើកលែងតែកងយោធា៣ ឬ៤ពាន់នាក់ ដែលនៅក្រោមបញ្ជាការរបស់ឧត្តមសេនីយ៍ អាឡិក សង់ដ្រឺ ដែលបានរត់រួចចូលទៅប្រទេសចិន ។ ឯ ដឺគូ និងនាយទាហានជើងក្រហមចំនួន១០កងយោធភូមិក៏ត្រូវកងទ័ពជប៉ុនមកចាប់ដោយមិនដឹងខ្លួន ។

ស្អែកឡើងតាមសេចក្ដីស្នើរបស់ជប៉ុនព្រះបាទនរោត្តម សីហនុ នៅក្រុងភ្នំពេញ និងព្រះបាទស៊ីសាវ៉ាងវង្សនៅក្រុងវៀងច័ន្ទបានប្រកាសឯករាជ្យនៃប្រទេសរៀង១ខ្លួន ព្រមទាំងបំបាត់ចោលនូវអាណានិគមនិយមបារាំងទៀតផង ។ ចំណែកឯអធិរាជ បាវ ដាយ នៅក្រុងហ្វេ ក៏បានប្រកាសដូចគ្នាដែរ នៅថ្ងៃទី១១ មីនា ១៩៤៥ ។ ពេលនោះហើយជនជាតិយួនដែលបារាំងយកមកបំរើកិច្ចការអាណានិគមនិយមបារាំងនៅប្រទេសខ្មែរនោះត្រូវអស់ការងារធ្វើ ។ យួនមួយចំនួនដែលចេះភាសាខ្មែរ ក៏បន្លំរស់នៅក្នុងប្រទេសខ្មែរតទៅទៀត ឯមួយចំនួនទៀតបានរត់ចូលព្រៃរួមដៃជាមួយពួកយៀកមិញ ហើយចំនួនតិចគ្នាណាស់ដែលសុខចិត្តត្រឡប់ទៅនៅស្រុកកំណើតវិញ ។


និពន្ធដោយ ឡឹក សំអឿន ហៅ "ផ្កាយព្រឹក"

(ពេលនោះ ខ្ញុំនៅរៀនថ្នាក់ទីបញ្ចប់នៃបឋមសិក្សានៅទីរួមខេត្តស្វាយរៀងដែលបានសំណាក់អាស្រ័យនៅជាមួយគ្រួសារវៀតណាមម្នាក់ឈ្មោះលោក ឡេ មិនអឺរ ជាថីរ៉េស៊ីសង់ត៍ ហើយជាមិត្តភ័ក្ដិរបស់គ្រូបង្រៀនខ្ញុំឈ្មោះលោក ចិន សំ ដែលជាអ្នកយកខ្ញុំមកផ្ញើឱ្យជួយឧបត្ថម្ភតាំងពីខ្ញុំបានចូលរៀនថ្នាក់ទី១ ក្នុងឆ្នាំ១៩៤២ ។ លោកឡេមិនធីរ តែងអប់រំពន្យល់ខ្ញុំជារឿយ១ថា ឱ្យខ្ញុំខំព្យាយាមរៀនសូត្រដើម្បីយកចំណេះវិជ្ជាទៅបំរើស្រុកទេស ។ រវាងខែតុលា ឆ្នាំ១៩៤៥ គាត់ក៏បានឱ្យខ្ញុំដឹងថា គ្រួសារគាត់ត្រូវត្រឡប់ទៅវៀតណាមវិញ ឱ្យខ្ញុំរកទីសំណាក់អាស្រ័យនៅចុះក្នុងបវេសនកាលវិញ) ។

នៅកម្ពុជា ជប៉ុនបាននិយាយនឹងមហាសេដ្ឋីខ្មែរ-ចិនម្នាក់ឈ្មោះ តាន់ ប៉ា ឱ្យទទួលភារកិច្ចដឹកនាំរដ្ឋាភិបាលលើកទី១ ក្នុងសម័យក្រោយអាណានិគមនិយមបារាំង តែលោក តាន់ ប៉ា មិនហ៊ានទទួល ។ ជប៉ុនក៏ទុករចនាសម្ព័ន្ធរដ្ឋាភិបាលឧកញ៉ាអ៊ុំង អ៊ី ឱ្យនៅដដែល ។ តំណែងរដ្ឋមន្ត្រីទី១ ដែលពីដើមនៅក្នុងដៃរ៉េស៊ីដង់ត៍ស៊ុប៉េរីយើរបារាំងត្រូវត្រឡប់មកនៅក្នុងដៃស្ដេចខ្មែរវិញ ដែលមានអគ្គទីប្រឹក្សាជប៉ុនម្នាក់នៅអម ។

មួយអាទិត្យក្រោយពីថ្ងៃប្រកាសឯករាជ្យប្រទេសកម្ពុជារួចមកលោក មាស ណាល់ រដ្ឋមន្ត្រីក្រសួងសិក្សាធិការបានដាក់បញ្ជាឱ្យប្រើឡើងវិញនូវប្រតិទិនចន្ទគតិព្រមទាំងឱ្យប្រើភាសាខ្មែរក្នុងកិច្ចការរដ្ឋាភិបាល ហើយឱ្យឈប់ប្រើអក្សររ៉ូម៉ាំង ។ ថ្ងៃទី២១ មីនា ១៩៤៥ លោក ប៉ាច ឈឺន, នួន ដួង, លោកគ្រូអាចារ្យ ប៉ាង ខាត់ និងលោក ប៊ុណ្ណចន្ទ ម៉ុល បានត្រូវគេដោះលែងពីកោះត្រឡាច ហើយបានត្រឡប់មកស្រុកកំណើតវិញ ។ ឯលោក សឺន ង៉ុកថាន់ ក៏បានត្រឡប់មកពីប្រទេសជប៉ុនវិញ នៅដើមខែ ឧសភា ហើយបានទទួលការតែងតាំងជារដ្ឋមន្ត្រីក្រសួងការបរទេសតាមសេចក្ដីស្នើសុំរបស់ជប៉ុននៅថ្ងៃទី១ មិថុនា ១៩៤៥ ។

ពេលដែលលោក សឺន ង៉ុកថាន់ បានឡើងមកលើឆាកនយោបាយវិញនោះ ព្រះករុណានរោត្តម សីហនុ ដែលនៅក្មេងត្រចៀកស្រាលឆាប់ជឿគេនោះ បានត្រូវពពួកមនុស្សចង្រៃពុករលួយពូកែលុតក្រាបអែបអបឡេមឡឺមដែលជាទីប្រឹក្សាផ្លុំត្រចៀកថា ឱ្យប្រយ័ត្ន សឺន ង៉ុកថាន់ និងក្រុមអ្នករាជានិយម ។ ដូច្នេះព្រះចៅសីហនុក៏បានបង្កើតមុខងារមួយហៅថា "ទីប្រឹក្សារាជរដ្ឋាភិបាល" ដោយបានតែងតាំងសម្ដេចក្រុមព្រះស៊ីសុវត្ថិ មុនីរ៉េត ឱ្យទទួលមុខនាទីនេះ ដែលអាចមានសម្លេងពិភាក្សានៅក្នុងគណៈរដ្ឋមន្ត្រីទៀតផង ។ ព្រះចៅសីហនុបានដាក់ទីប្រឹក្សា២រូប គឺលោក ម៉ែន នុត ជារដ្ឋមន្ត្រីរងក្រសួងហិរញ្ញវត្ថុ និងលោក ផូ ព្រឿង ជាអធិការហិរញ្ញវត្ថុ ។

ប៉ុន្តែនៅប្រទេសបារាំងឯណោះវិញ នៅថ្ងៃទី១៥ មីនា ១៩៤៥ ឧត្តមសេនីយ៍ ដឺហ្គោល បានថ្លែងការណ៍ទៅកាន់ប្រជារាស្ត្របារាំងដោយបានស្ដីបន្ទោសនយោបាយរបស់រដ្ឋាភិបាលប៉េកាំង ដែលបោះបង់ចោលអាណានិគមនិយមបារាំង រួចក៏បានអះអាងនូវសេចក្ដីសង្ឃឹម និងចំណង់ចិត្តរបស់បារាំងដែលចង់ឃើញការរំដោះយកឥណ្ឌូចិនមកវិញ ។ ថ្ងៃទី ២៥ មីនា ១៩៤៥ រដ្ឋមន្ត្រីក្រសួងអាណានិគមនិយមបារាំងបានប្រកាសថា កាលណារំដោះឥណ្ឌូចិនបានហើយគេនឹងបង្កើតសហព័ន្ធឥណ្ឌូចិនដែលត្រូវស្ថិតនៅក្នុងសហភាពបារាំង ហើយបារាំងនឹងការពារផលប្រយោជន៍លើផ្ទៃអន្តរជាតិជំនួស ។ ឯរចលនានៃសហព័ន្ធឥណ្ឌូចិននេះ មិនទាន់បានរៀបចំនៅឡើយទេ គ្រាន់តែមានពាក្យសន្យាខ្លះ១ដូចតទៅ:

"ជនជាតិទាំងឡាយដែលនៅក្នុងសហព័ន្ធនឹងទៅជាពលរដ្ឋឥណ្ឌូចិនផង ជាពលរដ្ឋនៃសហភាពបារាំងផង ដែលនឹងអាចបំពេញមុខងារក្នុងរដ្ឋការសហព័ន្ធឥណ្ឌូចិន និងនៅក្នុងសហភាពបារាំង។ សហព័ន្ធឥណ្ឌូចិនត្រូវមានរដ្ឋាភិបាលកណ្ដាលមួយដឹកនាំដោយអគ្គទេសាភិបាលម្នាក់ ។ ប្រទេសទាំង៥ ដែលមានអរិយធម៌ និងជាតិសាសន៍ខុសគ្នា នឹងត្រូវរក្សាទុកនូវលក្ខណៈផ្ទាល់របស់ខ្លួននៅក្នុងសហព័ន្ធឥណ្ឌូចិន ។ល។

សេចក្ដីប្រកាសនេះ បានទៅជាមូលដ្ឋាននៃខ្សែបន្ទាត់នយោបាយរបស់បារាំងក្នុងកំឡុងឆ្នាំក្រោយ១មកទៀត ។ ចំណែកឯនៅឥណ្ឌូចិនវិញក្រោយពីការរំលាយអំណាចបារាំងទៅ ហើយប្រទេសនៅឥណ្ឌូចិនក៏បានប្រកាសឯករាជ្យរៀង១ខ្លួនមកបញ្ហាកំណត់ព្រំដែនរវាងប្រទេសកម្ពុជា និងប្រទេសយួន ក៏កើតមានឡើងភ្លាម ។

ថ្ងៃទី ១៧ មេសា ១៩៤៥ នៅប្រទេសយួន រដ្ឋាភិបាល ត្រឹង គីម បានត្រូវតែងតាំងឡើង ហើយក៏បានចាប់គិតគូរ បង្រួបបង្រួមប្រទេសយួនដោយបញ្ចូលដែនដីខ្មែរកូសាំងស៊ីនទៅក្នុងប្រទេសយួន ។ ថ្ងៃទី ១៨ មិថុនា ១៩៤៥ អធិរាជយួន បាវ ដាយ បានធ្វើសេចក្ដីថ្លែងការណ៍មួយបញ្ជាក់នូវគោលបំណងរបស់រដ្ឋាភិបាលក្រុងហ្វេ ឯកភាពនៃប្រទេសវៀតណាមត្រូវនៅក្រោមការគ្រប់គ្រងរបស់រដ្ឋាភិបាលក្រុងហ្វេមិនត្រឹមតែទ្រុងគី (អណ្ណាម,បាក់ គី (តុងកឹង) ប៉ុណ្ណោះទេ គឺថែមទាំងទឹកដីកម្ពុជាមានប្រតិកម្មហើយព្រះចៅ.....

**តទៅលេខក្រោយ**

## តមកពីទំព័រទី ៤ លោក មេត្រី កែវ និងអេវ៉ាន ហាន ទទួលការកោត...

ចំណាយថាមពលកម្លាំងកាយការយកចិត្តទុកដាក់ និងសេចក្ដីសង្ឃឹមក្នុងការបង្កើតឱ្យមានការផ្លាស់ប្ដូរជាវិជ្ជមាននៅក្នុងសហគមន៍។ លោកមេត្រី និងអេវ៉ានបានផ្ដល់ដល់នាងនូវទស្សនវិជ្ជមានដែលនាងមើលឃើញពីសហគមន៍ខ្មែរ និងធនធានអ្នកចេះដឹងដែលខ្មែរមាននៅសហរដ្ឋអាមេរិកនេះ ជាពិសេសគឺបញ្ញវ័ន្តវ័យក្មេងទាំងនោះ។ គួរបញ្ជាក់ផងដែរ កម្មវិធីរាត្រីនោះប្រព្រឹត្តទៅដោយមានការចូលរួមដឹកនាំកម្មវិធីដោយស្ត្រីខ្មែរវ័យក្មេងឆ្នើមមួយរូបដែលសកម្មក្នុងសហគមន៍ដូចគ្នាដែរ គឺអ្នកនាង បុប្ផា មេឡុន ( Bopha Melone) បំពេញការងារនៅធនាគារអ៊ិនធឺប្រែស៍ (Enterprise Bank)។

គួរបញ្ជាក់ផងដែរ លោកមេត្រី កែវ កើតនៅប្រទេសកម្ពុជាឆ្នាំ១៩៨០ ហើយមករស់នៅសហរដ្ឋអាមេរិកនៅអាយុ៤ឆ្នាំក្នុងក្រុងសីអាថលរដ្ឋវ៉ាសិនតោន។ លោកបានសិក្សាផ្នែកច្បាប់នៅសាកលវិទ្យាល័យច្បាប់ស៊ីអាថលរដ្ឋវ៉ាស៊ីនតោន (Seattle University School of Law)។ លោកបានបំពេញការងារជាមេធាវីនៅរដ្ឋញូយ៉ករយៈពេល៥ឆ្នាំ និងក្រោយមកផ្លាស់មកបំពេញការងារនៅឡូវែល។ ចំណែកឯលោក អ៊ីវ៉ាន ហាន កើតនៅឆ្នាំ១៩៨៣ ក្នុងប្រទេសថៃតែធំធាត់ឡើងនៅឡូវែល។ លោកបានទៅសិក្សានៅសាកលវិទ្យាល័យបិនថ៍លី (Bentley University)។ អ្នកទាំងពីរទទួលបានពានកិត្តិយសកោតសរសើរជាលើកទីមួយ ហើយនេះជាសញ្ញាណវិជ្ជមានដ៏ល្អ និងមានសារៈសំខាន់ជាគម្រូសម្រាប់ខ្មែរវ័យក្មេងជាច្រើនទៀតក្នុងសហគមន៍សងគុណដល់សហគមន៍ដែលខ្លួនរស់នៅ៕




☑ មិនកាត់នាទី និងមិនផុតកំណត់

☑ សម្លេងឮច្បាស់ល្អទូរស័ព្ទទៅស្រុកខ្មែរ

Veth Ratana

To Call CAMBODIA!

5.3¢ per minute

| Buy | Minutes | +10% |
|---|---|---|
| $2.00 | ~~37~~ | 41 |
| $5.00 | ~~94~~ | 103 |
| $10.00 | ~~188~~ | 207 |

**Buy today and get 10% more!**

Tel: (978) 942 1641/ (978) 656 8141
(267) 253 3947

www.cambodiaphonecard.us

